សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា
KhmerPost USA
Advertising: PA/NJ/NY: (267) 253-3947 MA/RI: (978) 656-8141



32 Wamesit St., Lowell, MA 01852. Phone-Fax (978) 656 8141 www.khmerpost.us

## វិចារណកថា

# កម្ពុជាភ្ញាក់រស់ជាតិ បោះឆ្នោតបែបថ្មី



**ដោយ : ពិន សំខុន**

ខែកក្កដា២០១៣ខាងមុខកម្ពុជានឹងបោះឆ្នោតជ្រើសរើសសមាជិកសភាជាតិលើកទី៥ រាប់តាំងពីការបោះឆ្នោតឆ្នាំ១៩៩៣រៀបចំដោយអង្គការសហប្រជាជាតិមក ។ ការចងសម្ព័ន្ធដើម្បីឈ្នះសន្លឹកឆ្នោតមានច្រើនដង តែលើកនេះការចងសម្ព័ន្ធរបស់គណបក្សប្រឆាំងតទល់នឹងគណបក្សកាន់អំណាចមានលក្ខណៈទំនើបដែលប្រជាជាតិខ្មែរនឹងបានភ្ញាក់រស់ជាតិថ្មី ជាលើកដំបូងបង្អស់ក្នុងដំណើរទៅរកលទ្ធិប្រជាធិបតេយ្យ ។

ការដាក់សន្លឹកឆ្នោតមួយទៅក្នុងហិបឆ្នោតរបស់ពលរដ្ឋខ្មែរម្នាក់ៗត្រូវតែគោរពឱ្យបានខ្ជាប់ខ្ជួនតាមយន្តការណ៍ច្រើនស្រទាប់ ដើម្បីទទួលបាននូវលទ្ធផលល្អក្នុងចំណាត់ថ្នាក់ជាប្រជាជាតិនៃ **តទៅទំព័រទី ១៧**

# ខ្យល់ព្យុះកំណាចនៅអូក្លាហូម៉ា

**ដកស្រង់ព័ត៌មាន**

ខ្យល់ព្យុះកំប៉ុតត្បូងបានកួចបោកបក់លើក្រុងអូក្លាហូម៉ាយ៉ាងខ្លាំងក្លា កាលពីថ្ងៃទី២០ កន្លងទៅក្នុងរយៈពេលតែ៤០នាទីប៉ុណ្ណោះ បានធ្វើឱ្យក្រុងទាំងមូលខូចខាតជាដំណំ ធ្វើឱ្យមនុស្សស្លាប់៩១នាក់ មានក្មេង២០នាក់ និងរបួស១៤៥នាក់ទៀត **តទៅទំព័រទី ០៥**



# សាកលវិទ្យាល័យសម្រាប់សហគមន៍ម៉ីឌលស៊ិក ចែកសញ្ញាបត្របញ្ចប់ការសិក្សាឆ្នាំ២០១៣

**ក្រុងឡូវែល:** មនុស្សសរុបប្រមាណ៨០០០នាក់បានចូលរួមអបអរសាទរនិស្សិតដែលទទួលបរិញ្ញាប័ត្ររងពីមហាវិទ្យាល័យសម្រាប់សហគមន៍ម៉ីឌលស៊ិកនាថ្ងៃព្រហស្បតិ៍ទី២៣ខែឧសភាឆ្នាំ២០១៣កន្លងទៅនេះ ។ ពិធីបញ្ចប់ការសិក្សាប្រព្រឹត្តទៅនៅសាលអនុស្សាវរីយ៍ក្រុងឡូវែល (Lowell Memorial Auditorium) ក្រោមអធិបតីភាពសាកលវិទ្យាធិការខារ៉ូលអេខូវែន (Carole A. Cowan) និងមានការចូលរួមពីសំណាក់ព្រឹទ្ធបុរសមន្ត្រីបម្រើការសាស្ត្រាចារ្យក្នុងមហាវិទ្យាល័យក៏ដូចជានិស្សិតក្រុមគ្រួសារមិត្តភក្តិសាធារណជនទូទៅផងដែរ ។ កម្មវិធីនេះចាប់ផ្ដើមនៅម៉ោង១០ព្រឹក ហើយគេសង្កេតឃើញមានវត្តមាននិស្សិតខ្មែរ និងក្រុមគ្រួសារបងប្អូនខ្មែរចូលរួមកម្មវិធីផងដែរ ស្របគ្នានឹងវត្តមានរបស់ជាតិសាសន៍ដទៃទៀត ។ **តទៅទំព័រទី ២៤**





# សម្ភាសន៍ជាមួយលោក សម រង្ស៊ី ស្តីពីស្ថានភាពគណបក្សសង្គ្រោះជាតិ

តពីលេខ ១២៨

•••ហើយសម្តេចសីហនុមិនមែនទៅភ្នំពេញឱ្យយួនចាប់ទេ តែទៅឡើងសោយរាជ្យ ដូច្នេះយុទ្ធសាស្ត្រដែលត្រូវពង្រឹងជាមួយកម្លាំងអន្តរជាតិគឺជាការចាំបាច់ ។

**ពិន សំខុន :** មុននេះបន្តិចលោក ម៉ម សុណង់ដូ បានត្រឡប់ពីស្រុកបារាំងឱ្យគេចាប់ រឿងទាំងបីមានបញ្ហាទឹកដីបញ្ហាអន្តោប្រវេសន៍ និងបញ្ហាកម្ពុជាក្រោម ដូច្នេះវាគ្រប់គ្រាន់ហើយ ថែមពីលើនេះទៀតគេមានសិទ្ធគ្រប់គ្រងសម្បត្តិជាតិខ្មែរដោយព្រៃសម្បទានសន្ទិកសន្ទាប់៩៩ឆ្នាំយួនគេ និងថា បើទុកឱ្យគណបក្សសង្គ្រោះជាតិឈ្នះច្បាស់ជាមិនបណ្តោយឱ្យយួនធ្វើតាមអំពើចិត្តដូចសព្វថ្ងៃនេះទេ





ដាក់គុកនៅភ្នំពេញបានធ្វើឱ្យល្អក់កេរ្តិ៍ឈ្មោះថាខ្លាចមិនហ៊ានប្រឈមមុខ និងតុលាការភ្នំពេញ លោកមានអារម្មណ៍យ៉ាងណាដែរ ?

**សម រង្ស៊ី :** ករណីនិមួយៗវាខុសគ្នាខ្ញុំប្រឈមមុខជាមួយយួននាយករដ្ឋមន្ត្រីខ្លួនឯងតែម្តង ង្វៀង កុងទុង បានបញ្ជាទៅលោក ហ៊ុន សែន នៅថ្ងៃទី៤ ខែវិច្ឆិកា ឆ្នាំ២០០៩ ដែលខ្ញុំដកបង្គោលព្រំដែនដែលយួនដាំនោះ ធ្វើឱ្យយួនក្តៅក្រហាយយ៉ាងខ្លាំងដែលនេះពុំមែនជារឿងខ្មែរទល់ និងខ្មែរទេ គឺអ្នកស្នេហាជាតិខ្មែរហ៊ានតទល់នឹងយួន ដូច្នេះយួនវាបញ្ជាលោក ហ៊ុន សែន ឱ្យកំចាត់ខ្ញុំ... បញ្ហាឯកភាពជាតិពិបាករកឃើញណាស់ ខ្លះគេប្រៀបធៀបរឿងខ្មែរទៅនឹងភូមាតែភូមារបបផ្តាច់ការគេសុទ្ធតែជាមនុស្សឯករាជ្យគេស្រឡាញ់ជាតិគេ គេអាចរកឯកភាពជាតិឃើញ រីឯមនុស្សផ្តាច់ការខ្មែរមិនដូចគ្នាទេគឺគាត់បំរើផលប្រយោជន៍យួន ដូច្នោះពិបាកនិយាយឱ្យចុះសម្រុងគ្នាណាស់ ។

**ពិន សំខុន :** ក្នុងករណីសេដ្ឋកិច្ចពិភពលោកបច្ចុប្បន្ន ហេតុអ្វីក៏យួនក្តី ចិនក្តី ចូលចិត្តប្រើគណបក្សប្រជាជនជាជាងមានទំនាក់ទំនងល្អជាមួយគណបក្សប្រជាធិបតេយ្យ ?

**សម រង្ស៊ី :** ប្រទេសនិមួយៗគេគិតប្រយោជន៍របស់គេប្រទេសយួនគេបានព្រៃសម្បទានគេបានឱ្យប្រជាជនរបសគេចូលមករស់នៅលើទឹកដីខ្មែររាល់ថ្ងៃគេលួចយកដីខ្មែរដោយបង្ខិតបង្គោលសីមារគេអាចចាប់ខ្មែរក្រោមណាដែលមិនស្តាប់បង្គាប់គេបញ្ជូនទៅស្រុកយួនវិញ ដរាបណាលោក ហ៊ុន សែន បំពេញចិត្តគេលើ

**ពិន សំខុន :** យួនមានគិតទេថា គណបក្សប្រជាធិបតេយ្យអាច និងឈ្នះឆ្នោតថ្ងៃណាមួយការមិនត្រៀមអាច និងខូចខាតច្រើន ?

**សម រង្ស៊ី :** យួនជាអ្នកឈ្លានពានឱ្យគេគិតខ្លួនឯងទៅ!

**ពិន សំខុន :** ខ្ញុំចង់និយាយថា លោកធ្វើដំណើរខាងក្រៅស្រុកច្រើនដោយសារតែគេគិតពីប្រយោជន៍ស្រុកគេហ្នឹង តើមានឃើញសញ្ញានៃការប្រែប្រួលឥរិយាបថរបស់យួនដែរឬទេ ?

**សម រង្ស៊ី :** ខ្ញុំមិនបានចូលរួមប្រជុំអ្វីជាមួយយួនទេ គេអាចនិងគិតដល់រឿងហ្នឹងបាន

**ពិន សំខុន :** កាលពីទស្សនកិច្ចថ្មីៗនៅប្រ-ទេសបារាំងលោកបាននិយាយថា លោកបានអញ្ជើញទៅប្រទេសចិនពីរបីដង ហើយលោកថាមិនអាចនិយាយបាននៅពេលនោះ តើលោកអាចនិយាយបានហើយ ឬនៅនាពេលនេះអំពីផលប្រយោជន៍ចិននៅកម្ពុជា ?

**សម រង្ស៊ី :** ខ្ញុំបានទៅប្រទេសចិនមែននរណាក៏ដឹងដែរថា យួនចង់ចាប់ខ្ញុំ បើចិនចូលដៃនឹងយួន គឺគេនឹងមិនឱ្យខ្ញុំចូលស្រុកចិនទេ... ចិនគេគិតពីអនាគតស្រុកគេ គេគិតថា កម្ពុជាគឺមានកម្លាំងនយោបាយច្រើនចិនមិនយកកម្លាំងស្នេហាជាតិពេលមុនជាគណបក្ស សម រង្ស៊ី ឥឡូវជាគណបក្សសង្គ្រោះជាតិ គេមិនចង់យកយើងជាសត្រូវទេ បានជាមានទំនាក់ទំនងល្អជាមួយយើង

**ពិន សំខុន :** ឥឡូវងាកមករកការបោះឆ្នោតវិញម្តងលោកបានទស្សន៍ទាយបន្ទាប់ពីលទ្ធផលឃុំសង្កាត់ឆ្នាំមុនថា **តទៅទំព័រទី ១៧**

## កិច្ចសម្ភាសន៍រវាង

# អ្នកស្រី ទេព វន្នី សកម្មជនដីធ្លី នៅតំបន់បឹងកក់ ជាមួយ "ខ្មែរផុស"



**ដោយ : អ៊ុម លឿម**

ក្នុងដំណើរទស្សនៈកិច្ចមកកាន់សហរដ្ឋអាមេរិករបស់អ្នកស្រី ទេព វន្នី ជាសកម្មជនដីធ្លីដ៏សំខាន់និងល្បីល្បាញនាពេលថ្មីៗនេះ "ខ្មែរផុស" ត្រូវបានទទួលការអនុញ្ញាតិឱ្យមានកិច្ចសម្ភាសន៍ជាមួយអ្នកស្រីនៅក្នុងបរិវេណវត្តមួយនៃទីក្រុងហ្វីឡាដែលហ្វៀក្នុង ខណៈខ្លួដែលអ្នកស្រីចូលរួមបុណ្យសពអ្នកស្រុកហ្វីឡាដែលហ្វៀដែលមានខ្លឹមសារទាំងស្រុងជាអាទិ៍:

**អ៊ុម លឿម :** ជាបឋមខ្ញុំបាទសូមជំរាបសួរអ្នកស្រី ទេព វន្នី តើអ្នកស្រីអញ្ជើញមកកាន់សហរដ្ឋអាមេរិកនេះនៅពេលណាដែរបាទ?

**ទេព វន្នី :** ចាស់ ! នាងខ្ញុំមកនៅថ្ងៃទី ២៨ ខែមិនា ឆ្នាំ២០១៣ ហើយនាងខ្ញុំនឹងវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ នៅថ្ងៃទី ០៩ ខែមេសា ចាស់ ។

**អ៊ុម លឿម :** តើការអញ្ជើញកាន់សហរដ្ឋអាមេរិករបស់អ្នកស្រីមានកត្តាសំខាន់ផ្តោតលើអ្វីខ្លះបាទ ?

**ទេព វន្នី :** ចាស់ ! និយាយរួមទៅអ្វីដែលធ្វើឱ្យនាងខ្ញុំបានមកកាន់សហរដ្ឋអាមេរិកនេះ គឺមានការអញ្ជើញពីអង្គការមួយដែលមានអាយុជាង១៥ឆ្នាំមក ហើយដែលបានបង្កើតឡើងដោយលោកជំទាវ ហ៊ិល ឡារីក្លីនតុន ។ នៅក្នុងនោះដែលនាងខ្ញុំជាសកម្មជនម្នាក់ដែលបានទទួលពានពីអង្គការ Vital Vioces ហើយពាននេះផងដែរ គឺសម្រាប់សហគមន៍បឹងកក់ទាំងអស់ដែលមានពួកគាត់ គឺជាស្ត្រីដែលខំតស៊ូទាមទារគ្រប់ឧសគ្គមិនរាថយ ដើម្បីការពារសិទ្ធលំនៅដ្ឋានរបស់ពួកគាត់ និងសិទ្ធិរស់រានរបស់ពួកគាត់ ចាស់ ។

**អ៊ុម លឿម :** ក្នុងដំណើរមកកាន់សហរដ្ឋអាមេរិករបស់អ្នកស្រី តើអ្នកស្រីបានធ្វើដំណើរទៅកាន់សហគមន៍ខ្មែរនៅរដ្ឋណាខ្លះបាទ?

**ទេព វន្នី :** ចាស់ ! សម្រាប់នៅសហរដ្ឋអាមេរិកនេះ នាងខ្ញុំបានទៅត្រឹមតែគោលដៅដែលនាងខ្ញុំទៅ គឺវ៉ាស៊ីនតុនឌីស៊ី ។

**អ៊ុម លឿម :** តើមានរដ្ឋផ្សេងៗត្រូវបានអញ្ជើញអ្នកស្រីឱ្យទៅទស្សនៈកិច្ចនៅទីនោះដែរទេ? ។

**ទេព វន្នី :** ចាស់ ! មានដូចជា នៅទីក្រុងឡុងប៊ិចផងដែរ ដែលសហគមន៍ខ្មែរនៅទីនោះបានអញ្ជើញនាងខ្ញុំ ប៉ុន្តែគួរឱ្យសោកស្តាយដោយសារនាងខ្ញុំ ពុំមានពេលវេលាគ្រប់គ្រាន់ ។

**អ៊ុម លឿម :** តើចំពោះពានរង្វាន់ហ្នឹងតើអ្នកស្រីបានទទួលចំនួនប៉ុន្មានដែរ ហើយពីអង្គការណាខ្លះបាទ ?

**ទេព វន្នី :** និយាយរួមទៅនាងខ្ញុំចេញពីប្រទេសកម្ពុជានៅថ្ងៃទី២០ ហើយថ្ងៃទី២១ នាងខ្ញុំបានទៅដល់ប្រទេសហុឡង់ ហើយនៅទីនោះខាងសហគមន៍បឹងកក់យើងខ្ញុំក៏បានទទួលពានមួយដែរ ឈ្មោះថា Golden Batterfly ដែលជាពានរង្វាន់អ្នកការពារសិទ្ធមនុស្សសម្រាប់ឆ្នាំ២០១២ ។

**អ៊ុម លឿម :** ក្នុងដំណើរមកកាន់ប្រទេសដ៏ទំនើបជឿនលឿនមួយនេះ ហើយបើបែរក្រោយទៅមើលប្រទេសកម្ពុជាវិញ តើអ្នកស្រីអាចប្រៀបធៀបអំពីទិដ្ឋភាពទូទៅរបស់ប្រជាពលរដ្ឋអាមេរិក និងជីវភាពនៃការរស់នៅរបស់បងប្អូនខ្មែរនៅឯប្រទេសកម្ពុជាយ៉ាងណាដែរបាទ?

**ទេព វន្នី :** ចាស់ ! នាងខ្ញុំមានអារម្មណ៍ថាហាក់មានការប្លែកយ៉ាងខ្លាំងសម្រាប់ជីវិតនាងខ្ញុំព្រោះមិនធ្លាប់បានឃើញតាំងពីមុនៗមក សម្រាប់ប្រជាពលរដ្ឋ គឺមានការខុសប្លែកគ្នាយ៉ាងខ្លាំងក្នុងការរស់នៅ ដោយសារតែប្រទេសទាំងអស់ហ្នឹងគាត់មានការអភិវឌ្ឍន៍ជឿនលឿន ប្រជាពលរដ្ឋរស់នៅមានភាពថ្លៃថ្នូ ចាស់ គឺវាខុសគ្នាច្រើនមែនទែន ។

**អ៊ុម លឿម :** បញ្ហានៅសហគមន៍បឹងកក់ហាក់នៅជាបញ្ហាដ៏ក្តៅគគុកមួយនៅឡើយ ហើយភាពប្រទូស្តរាយរវាងក្រុមអ្នកភូមិ និងអាជ្ញាធរដែនដីបានធ្វើឱ្យបែកធ្លាយជាព័ត៌មានគួរឱ្យចាប់អារម្មណ៍ពោលតាំងពីព័ត៌មានជាតិ និងព័ត៌មានអន្តរជាតិ អ៊ីចឹងទេ តើអ្នកស្រីធ្លាប់បានគិតថា តើវិវាទដ៏រាំរៃនេះ នឹងមានច្រកសម្រាប់ដោះស្រាយដែរ ឬទេ ?

**តទៅទំព័រទី២០**

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ត្បិតលោកជូនជាកូនរាស្ត្រសាបញ្ញ ។ លោកជូនបានទទួលតំណែងជាឧកញ៉ាវាំងវរវៀងជ័យសេនាធិបតីក្រសួងរាជវាំងអស់រយៈពេល៣០ឆ្នាំ រហូតទៅដល់រជ្ជកាលព្រះបាទ ស៊ីសុវត្ថិមុនីវង្ស គាត់បានទៅជាមនុស្សសំណព្វរបស់បារាំង ព្រោះគាត់បានឱ្យដំណឹងទៅបារាំង កាលណាមានហេតុការណ៍អ្វីកើតឡើងក្នុងរាជវាំង ដូចជា រឿងអ្នកអង្គម្ចាស់ វិយ៉ូរ៉ា កូននរោត្តមដែលបម្រុងរំលំរាជស៊ីសុវត្ថិកាលពីឆ្នាំ ១៨១៧ ដែលត្រូវបានបារាំងបំបរបង់ឱ្យទៅប្រទេសលាវជាដើម ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ថ្កាយព្រឹក"

ព្រះបាទ នរោត្តម បានចូលទិវង្គត់នៅថ្ងៃទី ២៤ មេសា ១៩០៤ ។ ក្រុមប្រឹក្សារាជសម្បត្តិបានប្រជុំក្រោមអធិបតីភាពរ៉េស៊ីដង់ត៍ស៊ុបេរីយើរ ហើយបានចង្អុលទៅលើកូនស្តេចមួយអង្គ គឺព្រះអង្គម្ចាស់ស៊ីសុវត្ថិ ឱ្យគ្រងរាជ ដែលខុសពីច្បាប់ប្រពៃណីរាជបល្ល័ង្កខ្មែរ ។

ក្នុងរជ្ជកាលព្រះបាទស៊ីសុវត្ថិ គ.ស ១៩០៦-១៩២៧ និងក្នុងរជ្ជកាលព្រះបាទមុនីវង្ស គ.ស ១៩២៧-១៩៤១ ប្រទេសកម្ពុជាបានទទួលការកែទម្រង់ជាច្រើន ដែលត្រូវអនុវត្តដើម្បីបំបាត់ចោលបន្តិចៗម្តង នូវស្ថាប័នចាស់នៃរដ្ឋ ។ ដើម្បីឱ្យសម្រេចកិច្ចការនេះ រដ្ឋការអាណានិគមបារាំងត្រូវរកមនុស្សមកហ្វឹកហ្វឺនបញ្ចូលក្របខណ្ឌឱ្យគ្រប់គ្រាន់ ។ ជាដំបូងបារាំងបាននាំចូលប្រទេសខ្មែរនូវអ្នកធ្វើការជាជាតិយួន ។ ក្រោយមកមានរបាយការណ៍របស់អ្នកនិពន្ធបារាំងម្នាក់ឈ្មោះ ហ្វីលិព ដឺរីគ្ល (Phillip de Reglaire) ថា ពលរដ្ឋខ្មែរដែលជាកូនកាត់ខ្មែរ-ចិនជាជនជាតិពូកែ ឧស្សាហ៍ស្វាហាប់ មានសកម្មភាពឈ្លាសវៃមិនចាញ់យួនឡើយ ។ ដូច្នេះអ្នកទទួលខុសត្រូវនៃរដ្ឋការអាណានិគម ក៏មានការចាប់អារម្មណ៍ ហើយក៏យល់ស្របនឹងគំនិតនេះដែរ រួចក៏បានសម្រេចចិត្តបង្កើតសាលាបង្រៀនបារាំង-ខ្មែរ ឱ្យឈ្មោះថា "សាលារាជការ"ដែលបង្រៀនភាសាបារាំង និងមុខវិជ្ជាផ្សេងៗពីថ្នាក់បឋមសិក្សាដល់មធ្យមសិក្សា ។ សាលារៀនរាជការនេះទៀតសោតក៏មានតែនៅទីប្រជុំជនធំៗ គឺរាជធានី និងទីរួមខេត្តតែប៉ុណ្ណោះ ។

ដូច្នេះសិស្សដែលបានចូលរៀននៅសាលារាជការទាំងនេះ មានតែកូនចៅនាហ្មឺនរាជការទាំងនេះ មានតែកូនចៅនាហ្មឺនរាជការ កូនចៅអ្នកមានស្តុកស្តម្ភដែលភាគច្រើនជា កូនខ្មែរកាត់ចិន និងកូនខ្មែរកាត់យួន ។ ឯកូនអ្នកស្រែចំការខ្មែរសម័យនោះស្ទើរតែគ្មានសោះ ។ ពួកអ្នកសិក្សាសាលារាជការទាំងនេះហើយ ដែលភាគច្រើនជាសមាជិកនៃសង្គមល្បួតលាស់បានទទួលការសិក្សាអប់រំខ្ពង់ខ្ពស់ មានចំណេះវិជ្ជាអាចឱ្យគេមានលទ្ធភាពចេញទៅបន្តវិជ្ជានៅបរទេស រួចហើយខំប្រឹងប្រែងរកមធ្យោបាយញ៉ាំងជីវភាពរបស់គេ ឱ្យរុងរឿងទាន់សម័យ ដូចជាជាតិអឺរ៉ុបដែរ ។ ម្លោះហើយ ពួកទាំងនេះភាគច្រើនរមែងប្រណាំងប្រជែងគ្នាក្នុងសង្គមជាតិ បង្កើតជាបក្សពួកនាំឱ្យសៅហ្មង ខូចសាមគ្គីធម៌ក្នុងសង្គមខ្មែរ ព្រោះម្នាក់ៗគិតតែផលប្រយោជន៍ផ្ទាល់ខ្លួន ផលប្រយោជន៍គ្រួសារ និងបក្សពួកខ្លួន តែឥតមានគិតដល់ផលប្រយោជន៍ប្រជាជាតិខ្មែរសោះឡើយ ។

បន្ទាប់ពីមានសាលារាជការនេះមក នៅឆ្នាំ ១៩១១ ហ្លួងស៊ីសុវត្ថិ បានបញ្ជាឱ្យបង្រៀនភាសាខ្មែរដល់កូនក្មេង ដែលមានអាយុចាប់ពី៨ឆ្នាំឡើយទៅ នៅក្នុងវត្តអារាមទាំងឡាយ ក្នុងព្រះរាជាណាចក្រទាំងមូល ដែលហៅថា "សាលាវត្ត" ។ សាលាវត្តទាំងនោះ ពុំបានបង្រៀនភាសាបារាំង និងមុខវិជ្ជាទូទៅដូចសាលារាជការទេ ។ ដូចនេះ កូនសិស្សសាលាវត្តបានត្រឹមតែចេះអាន និងសរសេរអក្សរខ្មែរតែប៉ុណ្ណោះ រួចហើយក៏ប្រញាប់ទៅបន្តមុខរបរឪពុកម្តាយជីដូនជីតារបស់ខ្លួនតទៅទៀត បើពុំនោះសោតទេ ក៏ទៅបួសជាសាមណេរ ឬភិក្ខុរៀនវិជ្ជាពុទ្ធសាសនាតទៅ ព្រោះថា នៅក្នុងគ.ស១៩២០ មានសាលាបាលីរងនៅតាមខេត្តនានា ហើយមានសាលាបាលីជាន់ខ្ពស់មួយនៅរាជធានីភ្នំពេញ ។

កាលពីមុនឆ្នាំ១៩២០ ព្រះសង្ឃខ្មែរជាច្រើនអង្គធ្លាប់បាននិមន្តទៅបន្តវិជ្ជាឯក្រុងបាងកក ប្រទេសសៀម ហើយតែងតែបានជួបប្រាស្រ័យជាមួយព្រះអង្គម្ចាស់ យុគន្ធរ ជាព្រះរាជបុត្រនៃព្រះបាទនរោត្តម ដែលបារាំងបាននិរទេសហើយហាមឃាត់មិនឱ្យចូលស្រុកកំណើតវិញ ដោយហេតុថា ទ្រង់បានបើកកកាយនូវអំពើលាមកពុករលួយនៃអាជ្ញាធរបារាំង ដែលរួមដៃផ្សំគំនិតជាមួយអគ្គមហាសេនា និងថីបកប្រែភាសាបារាំង ។ លុះត្រឡប់មកកាន់មាតុភូមិវិញ ព្រះសង្ឃទាំងនោះតែងតែបាននាំនូវគំនិតថ្មីៗ ក្នុងការប្រឆាំងនឹងបារាំងដែលម្ចាស់ យុគន្ធរ បានសាបព្រួសទុកមកហើយនោះ ។

ដើម្បីការពារនូវគំនិតថ្មីដ៏មានគ្រោះថ្នាក់ដល់បារាំងនោះ ទើបរាជការបារាំងបង្កើតសាលាបាលីជាន់ខ្ពស់តែមួយគត់នៅរាជធានីភ្នំពេញ ។ ដូច្នេះសមណសិស្សដែលមានប្រាថ្នាចូលរៀនសាលាបាលីជាន់ខ្ពស់នោះ ត្រូវតែ **តទៅលេខក្រោយ**

# អ្នកក្រ និងអ្នកមាននៅប្រទេសខ្មែរ ភាគទី១១

**គីម សុស**

គីម សុស មន្ត្រីចូលនិវត្ត ក្រសួងការបរទេស សហរដ្ឋអាមេរិក

មនុស្សសំខាន់ជាងគេដែលត្រូវមានទម្លាប់ឱ្យបានល្អហ្មត់ចត់ក្នុងការគោរពច្បាប់ គឺសមាជិករដ្ឋាភិបាលទាំងអស់នេះជាអ្វីដែលយើងបាននិយាយនៅភាគមុននេះ។ ព្រោះទាំងអស់ទទួលការខុសត្រូវច្រើនជាងគេក្នុងការធ្វើឱ្យសម្រេចបាននូវជោគជ័យសម្រាប់ប្រទេស។ បើគិតឱ្យជ្រៅទៅនេះមានន័យថា សមាជិកទាំងអស់នៃរដ្ឋាភិបាលត្រូវតែជាគំរូសម្រាប់ប្រជាពលរដ្ឋក្នុងការគោរពច្បាប់នេះ។

តើអ្វីទៅដែលរដ្ឋាភិបាលត្រូវទទួលខុសត្រូវដើម្បីឱ្យប្រទេសបានសម្រេចជោគជ័យ។ ឆ្លើយគឺការដឹកនាំ។ ត្រង់នេះបានសេចក្តីថា រដ្ឋាភិបាលដឹកនាំប្រជាពលរដ្ឋឱ្យខំប្រឹងបង្កបង្កើនផលដើម្បីឱ្យបានជោគជ័យរបស់ខ្លួន។ ហើយកាលណាប្រជាពលរដ្ឋនៃប្រទេសមួយប្រកបដោយជោគជ័យប្រទេសនោះក៏ទទួលជោគជ័យដែរ។

ដូច្នេះការដឹកនាំជាគន្លឹះមួយដែលបង្ហាញផ្លូវទៅរកជោគជ័យ។ តែការដឹកនាំនឹងឈានទៅដល់ជោគជ័លបាន លុះណាតែការដឹកនាំនោះមានប្រសិទ្ធិភាព។

យើងទាំងអស់គ្នាដឹងហើយថាមានលក្ខណៈច្រើនដែលជួយធ្វើឱ្យអ្នកដឹកនាំទទួលនូវប្រសិទ្ធិភាពក្នុងការដឹកនាំបាន។ ប៉ុន្តែក្នុងចំណោមលក្ខណៈទាំងនោះ លក្ខណៈមួយដែលអ្នកដឹកគួរប្រកាន់យកឱ្យបានជាប់នឹងខ្លួនគឺការគោរពកោតសរសើរដែលបានមកពីការគោរពដល់អ្នកដទៃ ពីការធ្វើឱ្យអ្នកដទៃទុកចិត្តស្រឡាញ់រាប់អានពីការយកចិត្តទុកដាក់ជួយអ្នកដទៃ ពីការប្រព្រឹត្តសេចក្តីស្មោះត្រង់ និងទៀងត្រង់ពីការប្រព្រឹត្តអំពើសុចរិតពីការប្រព្រឹត្តអំពើបរិសុទ្ធិ និងពីការគោរពច្បាប់ជាដើម។ សមាជិកនៃរដ្ឋាភិបាលត្រូវតែធ្វើពលីកម្មដើម្បីឱ្យខ្លួនទទួលបាននូវការគោរពកោតសរសើរនេះដែលជាគុណសម្បត្តិចាំបាច់ក្នុងការដឹកនាំគឺមិនមែនការគោរពកោតសរសើរដែលបានមកពីការប្រើអំណាចសម្មតធ្វើឱ្យគេខ្លាចនោះទេ។ រដ្ឋាភិបាលគួរបំបាត់ចោលចេញពីខ្លួននូវទម្លាប់នៃការប្រើអំណាចសម្មតដើម្បីឱ្យគេគោរពធ្វើតាម។ យើងដឹងហើយថាក្រោយពីមានការគំរាមកំហែងសម្មត ដែលធ្វើឱ្យបុគ្គលណាមួយធ្វើអ្វីមួយតាមបុគ្គលនោះតែងតែប្រែទៅជាអ្នកប្រឆាំង ឬទៅជាសត្រូវតែម្តង។

នៅប្រទេសទាំងអស់ដែលខ្ញុំស្គាល់នៅពិភពលោកនេះ ដូចជាសហរដ្ឋអាមេរិកជាដើមពលរដ្ឋភាគច្រើនមើលឃើញថា រដ្ឋាភិបាលជាស្ថាប័នដែលបញ្ចូញអ្នកកំណាចដែលមានចំនួនតិចច្រើនតាមប្រទេសនេះបើតាមការយល់ដឹងរបស់ខ្ញុំ។ ក្នុងកត្តាទាំងឡាយដែលបណ្តាលឱ្យរបប ប៉ុលពត រលំមានកត្តាមួយគឺការសម្មតគំរាមកំហែងបង្ខិតបង្ខំឱ្យធ្វើការ។

នៅវាលពេលរដ្ឋាភិបាលត្រូវដឹងថា ខ្លួនជាអ្នកដឹកនាំ គឺដឹកនាំប្រជាពលរដ្ឋទាំងអ្នកមានទាំងអ្នកក្រនៅគ្រប់វិស័យ។

ខ្ញុំសុំរំលឹកនៅភាគមុននេះយើងបាននិយាយអំពីរដ្ឋាភិបាលដឹកនាំឱ្យប្រជាពលរដ្ឋគោរពច្បាប់នៅពេលនេះយើងនឹងនិយាយអំពីរដ្ឋាភិបាលដឹកនាំឱ្យប្រជាពលរដ្ឋយល់ស្របគ្នា ។ ដោយនិយាយអំពីការដឹកនាំ ដូច្នេះសមាជិករដ្ឋាភិបាលគួរចាំឱ្យច្បាស់ហើយរំលឹកខ្លួនឯងជារឿយៗថា ដើម្បីឱ្យមានប្រសិទ្ធិភាពក្នុងការដឹកនាំទាំងនោះ ខ្លួនត្រូវប្រកាន់យកគុណសម្បត្តិកោតសរសើរដែលបានរៀបរាប់ខាងលើនេះ។

នៅពិភពយើងនេះ រឿងខ្វែងគំនិតគ្នាដែលបណ្តាលឱ្យកើតវិបត្តិ ដូចជាឈ្លោះប្រកែកបែកបាក់គ្នា លែងលះគ្នា ធ្វើឱ្យជីវិតវេទនា កាប់សម្លាប់គ្នាធ្វើសង្គ្រាមជាដើមមកពីការមិនយល់ស្របគ្នា។

ដូច្នេះរឿងខ្វែងគំនិតគ្នាឬរឿងមិនយល់ស្របនឹងគ្នាជាបញ្ហាដែលសាកលលោកកំពុងដោះស្រាយ។

កំពុងដោះស្រាយនៅស្រុកខ្មែរបញ្ហាបឹងកក់រវាងក្រុមហ៊ុម និងអ្នកស្រុកបញ្ហាបុរីកីឡា រវាងក្រុមហ៊ុន និងអ្នកស្រុក និងបញ្ហាព្រះវិហាររវាងខ្មែរ និងថៃ នៅប្រទេសស៊ើរី(SYRIA)សង្គ្រាមស៊ីវិលដែលកំពុងបង្ហូរឈាមហើយធ្វើឱ្យមនុស្សស្លាប់អស់ជាងប្រាំបីម៉ឺននាក់ហើយមកដល់ថ្ងៃ២០ខែឧសភាឆ្នាំ២០១៣ នៅអាហ្វគ្ហានិស្ថាន (Afghanistan) សង្គ្រាមបង្ហូរឈាមអស់ជាងមួយទសវត្សរ៍ហើយនៅតែតទៅទៀត មនុស្សស្លាប់អស់រាប់ពាន់នាកហើយ ហើយក្នុងនោះមកដល់ថ្ងៃ២០ខែឧសភាឆ្នាំ២០១៣ អាមេរិកាំងស្លាប់អស់ជាងពីរពាន់នាក់ហើយដែរ នៅអាស៊ីកូរេខាងជើង(North Korea) កំពុងធ្វើឱ្យក្រុមលោកខាងលេចព្រួយបារម្ភអំពីរឿងចោទថាមានគម្រោងផលិតគ្រាប់បែកបរមាណូ ហើយនៅអាស៊ីនេះដែរ ប្រទេសចិន ហ្វីលិពីន (Philippines) វៀតណាម និងជប៉ុនកំពុងមានបញ្ហាតឹងតែងនឹងគ្នា។

រឿងមិនយល់គ្នាទៅវិញទៅមក ហើយនឹងរឿងខ្វះការ **តទៅទំព័រទី ១៥**

## តមកពីទំព័រទី ១ ខ្យល់ព្យុះកំណាចនៅអូក្លាហូម៉ា...

ក្នុងនោះមានក្មេង៧០នាក់ សេចក្តីរាយការណ៍ជាច្រើននិយាយថា ខ្យល់ព្យុះនោះបានធ្លាក់ដល់ដីនៅម៉ោង២:៤ងនាទីនៅខាងលិច"ញូខាសិល"ហើយធ្វើដំណើរប្រមាណ១៧ម៉ាយល៍ក្នុងល្បឿនខ្យល់គួច២១០ម៉ាយល៍ក្នុងមួយម៉ោងកាត់តំបន់ដែលមានមនុស្សច្រើនរស់នៅផ្ទះប្រមាណ២៤០០ខ្នងត្រូវខូចខាតធ្វើឱ្យមនុស្សគ្មានទីជម្រកប្រមាណ១ម៉ឺននាក់ សាក្សីនិយាយថា គឺជាខ្យល់ព្យុះដ៏មានកម្លាំងខ្លាំងក្លាបំផុត ដែលបានប៉ះពាល់ដល់សាលាសាធារណៈពីរ ១-គឺសាលា"ប្រាយ័នវូដ"មួយទៀត"ប្លាសាតាវ័រ"ដែលបានឈ្លូសបាក់បែកអស់សល់តែគំនរជញ្ជាំង និងឆ្អឹងដែកដែលក្រុមអ្នកសង្គ្រោះមានការលំបាក និងកាយយកកុមារ និងក្មេងៗដែលនៅជាប់ក្រោមគំនរបាក់បែកចេញមកក្រៅ ។

នៅក្នុងចំណោមអ្នករងគ្រោះយើងពុំទាន់មានព័ត៌មានពីសហគមន៍ខ្មែរដែលរស់នៅអូក្លាហូម៉ាថា មានរងគ្រោះដែរ ឬទេ ? យើងនិងជូនព័ត៌មាននៅពេលក្រោយ

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សៅរ៍ ទី១៨ ខែ ឧសភា ឆ្នាំ២០១៣

# អ្នកគ្រប់គ្រងរោងចក្រថា ការស្លាប់ដោយសារការបាក់ប្លង់សេសង្កត់លើ គឺជាឧបទ្ទវហេតុតូចតាច

**ខេមបូឌា ដេលី**

នគរបាលបានសាកសួរមនុស្សពីរបីនាក់ដែលពាក់ព័ន្ធ នឹងការបាក់ប្លង់សេកាលពីថ្ងៃព្រហស្បតិ៍ នៅឯរោងចក្រស្បែកជើងរបស់ជនជាតិតៃវ៉ាន់មួយនៅក្នុងខេត្តកំពង់ស្ពឺ ដែលធ្វើឱ្យមនុស្ស២នាក់ ស្លាប់ និងរងរបួស១១នាក់ ប៉ុន្តែបានដោះលែងពួកគេវិញនៅថ្ងៃដដែល ដោយគ្មានការចោទប្រកាន់ឡើយ។



អ្នកគ្រប់គ្រងជាន់ខ្ពស់ម្នាក់នៅរោងចក្រ វីងស្តាស៊ូ (Wing Star Shoes)ដែលផលិតស្បែកជើងកីឡាឱ្យក្រុមហ៊ុនលក់សម្ភារៈកីឡារបស់ជប៉ុនឃីហោអាស៊ីក (Asics)មានប្រសាសន៍កាលពីថ្ងៃសុក្រថា ក្រុមហ៊ុនរបស់លោកសោកស្តាយយ៉ាងខ្លាំងចំពោះការស្លាប់របស់កម្មករវ័យក្មេងទាំងពីរនាក់ ដែលលោកចាត់ទុកថា ជាឧបទ្ទវហេតុតូចតាច"ដែលមិនចាំមានការស៊ើបអង្កេតដើម្បីរកអ្នកទទួលខុសត្រូវចំពោះមុខច្បាប់នោះទេ។

លោក គៀន ចន្ទថារិទ្ធ អ្នកនាំពាក្យនគរបាលជាតិមានប្រសាសន៍កាលពីថ្ងៃសុក្រថា មនុស្សម្នាក់ក្នុងចំណោមមនុស្ស២នាក់ដែលបានហៅមកសាកសួរនោះ គឺអ្នកគ្រប់គ្រងរោងចក្រវីងស្តាស៊ូ រីឯមនុស្សទី២ គឺជាអ្នកទទួលខុសត្រូវក្នុងការសាងសង់ប្លង់សេទំហំប្រហែល៩ម៉ែត្រគុណនឹង១៥ម៉ែត្រដែលបានបាក់សង្កត់កម្មករនោះ។

លោក គៀត ច័ន្ទថារិទ្ធ មានប្រសាសន៍ថា "យើងបានអញ្ជើញបុរសជនជាតិពីរនាក់ មកសាកសួរកាលពីថ្ងៃព្រហស្បតិ៍។ ពេលនេះគេត្រូវបានអនុញ្ញាតឱ្យត្រឡប់ទៅវិញអស់ ហើយយើងនៅតែបន្តស៊ើបអង្កេតករណីនេះដដែល "។ លោកបានបន្ថែមថា ការស៊ើបអង្កេតកំពង់បន្ត ប៉ុន្តែលោកមិនអាចនិយាយបានទេថា នឹងអាចនាំឱ្យមានការចាប់ខ្លួនដរឬអត់នោះ។

មានប្រសាសន៍នៅឯសន្និសីទកាសែតនៅសណ្ឋាគារភ្នំពេញ ដែលចូលរួមដោយអ្នកគ្រប់គ្រងរោងចក្រ និងតំណាងសហគមរោងចក្រកាត់ដេរនៅកម្ពុជា អ្នកគ្រប់គ្រងផ្នែកដឹកជញ្ជូនរបស់រោងចក្រវីស្តាស៊ូ ឈ្មោះ ចាន់ កុសល បានសង្កត់ធ្ងន់ថា ការបាក់ប្លង់សេសង្កត់កម្មករ គ្មានអ្វីក្រៅអំពី "ឧបទ្ទវហេតុ អកុសលនោះទេ"។

លោក កុសល បានមានប្រសាសន៍ថា "កាលពីថ្ងៃព្រហស្បតិ៍ មានឧបទ្ទវហេតុតូចមួយបានកើតឡើង។ ក្រុមហ៊ុននឹងទទួលខុសត្រូវចំពោះគ្រួសារជនរងគ្រោះដោយសារតែការធ្វេសប្រហែសរបស់ខ្លួន"ហើយនឹងចេញប្រាក់សំណងដល់ពួកគេ។

លោកបានមានប្រសាសន៍បន្ត "ខ្ញុំគិតថា វាមិនមែនជាបញ្ហាធំរហូតឱ្យយើងត្រូវរត់គេចខ្លួន ឬក៏នាំទៅរកការចាប់ខ្លួនជនណាម្នាក់នោះទេ"។ លោកបន្ថែមថា តាមយោបល់របស់លោកអ្នកគ្រប់គ្រងរោងចក្រគួរតែប្រឈមនឹងការចោទប្រកាន់ ប្រសិនបើពួកគេមិនបានសងប្រាក់សំណងទៅឱ្យអ្នកស្លាប់ ឬអ្នករបួស។

លោកបន្តថា "ពាក់ព័ន្ធនឹងការចាបខ្លួនគួរតែធ្វើឡើងបើគ្មានដំណោះស្រាយ អំពីប្រាក់សំណងសម្រាប់ជនរងគ្រោះ"។

នៅពេលសួរថា តើរោងចក្រវីស្តាស៊ូទទួលបានការអនុញ្ញាតឱ្យសាងសង់ប្លង់សេនោះដែរ ឬអត់ លោក កុសល បានបង្វែរការទទួលខុសត្រូវដោយនិយាយថា ក្រុមហ៊ុនសំណង់ គឺជាអ្នកទទួលខុសត្រូវ ចំពោះប្លង់សេដែលបាក់នោះ ប៉ុន្តែលោកបានបដិសេធមិនបញ្ចេញឈ្មោះ **តទៅទំព័រទី ១៨**

# Factory Collapse Deaths Called 'Small Incident'

By KUCH NAREN
AND DENISE HRUBY
THE CAMBODIA DAILY

Police questioned two people over the deadly building collapse on Thursday at a Taiw3neseowned shoe factory- in Kompong Speu province that killed two people and left 11 injured, but released them the same day without charge.

A senior manager at the Wing Star factory, which produces sports shoes for Japanese brand Asics, said on Friday that his firm regretted the deaths of the two young workers, which he described as a "small incident" that did require an investigation to determine responsibility before the law.

Kirth Chantharith, spokesman. for the national police, said Friday that one of the two men called in for questioning was a manager at Wing Star Shoes Co. Ltd., while the second man was responsible for building the approximately 9- by-15 meter section of a cement ceiling that collapsed and crushed the workers below. "We invited two Cambodian men for questioning on Thursday. Now, they were let go already, and we are still investigating the case," Mr. Chantharith said, adding that an investigation is ongoing, and he could not say if it would lead to arrests.

Speaking at a news conference at the Phnom Penh Hotel attended by factory management and representatives of the Garment Manufacturers Association in Cambodia (GMAC), Wing Star's shipping manager, Chan Kosal, was at pains to stress that the collapse of the cement floor and the crushing of workers was nothing more than an unfortunate "accident" "[On Thursday], there was a small incident that took place ... the company will be responsible before the families for it's negligence, "and pay compensation, Mr. Kosal said. "I think it is not such a serious case that would lead us to run away, or should lead to the arrest of anyone," Mr. Kosal said, adding that in his opinion, people should only face charges if the factory did not pay compensation to the dead and injured. "Regarding an arrest, this should only happen in case there is no solution [on compensation] with the victims," he said.

Asked weather Wing Star had a permit to build the section of ceiling that collapsed, Mr. Kosal shifted responsibility, saying that a construction company was responsible for the collapsed floor, though he declined to name the company.

"My factory hired a sub-contractor for the construction ... we just used the building for work," he said. GMAC President Van Sou Ieng said that factories do not need approval for all construction work they undertake.

"Frankly speaking, the factories do not have to ask for permission for small constructions," he said From now on, however, factories should inspect the safety of their buildings, Mr. Ieng said.

Morm Narey, chief of the Kom pong Speu provincial department of land management, urban planning and construction, said at the factory on Thursday that the section that had collapsed was part of an unapproved expansion the company had built connecting two factory buildings.

'They built it technically wrong and then put heavy stuff on it," he said. Moeun Tola, head of the Community Legal Education Center's labor program, said on Friday that downplaying the incident was insulting to the victims and their families.

"How can you say it's a small accident? Two people died," he said. Authorities and the factory owners need to be held responsible as better maintenance and monitoring should have been in place, Mr. Tola said. "Even the authorities complained about the owner, and the construction had no permit. They are all just making excuses now," he said. So Panha, director general of Cambodia's board of professional engineers, declined to comment on construction standards at the Wing Star factory, but said that he had been tasked by the government to inspect the site and report. "I will go on Monday with a few other engineers, but I cannot assess it without going there," he said. Judging from pictures of the collapsed factory, Michael Shaw from the NGO Engineers Without Borders, concluded that the construction was not built to last, as the metal beams that appeared to have buckled were only joined by welding. "Welded joints are not structurally sound if there is any misalignment [and] beams should be bolted and flanged and welded, and sit on plinths," Mr. Shaw said in an email.

'This building [was] not designed and constructed to proper safety standards," Mr. Shaw concluded, adding that Cambodia had no such safety standards, and that a similar incident could occur again.

The Wing Star factory was not monitored by the International labor Organization's (ILO) Better Factories Cambodia. The ILO only started monitoring footwear factories last year, and out of the 45 footwear factories currently exporting shoes from Cambodia, only nine are being monitored by Better Factories, the program's

**Continued on page 15**

# ក្លូបូលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

ចំការកៅស៊ូជប់ បានរៀបរាប់ថា "ខ្ញុំមិនដឹង ... ម្យ៉ាងវិញទៀត ខ្ញុំមិនត្រូវបានឱ្យដឹងការងារច្រើនណាស់ណានោះទេ"[១៤៥] ។

ការកាប់ឈើនៅក្នុងព្រំប្រទល់ចំការរបស់ សេង កុកហ៊ាង ពាក់ព័ន្ធនឹងការដកចេញតម្របព្រៃឈើទាំងអស់ ។ ទោះយ៉ាងណាក៏ដោយ ការកាប់ឈើនៅក្រៅបរិវេណ ផ្តោតទៅលើចំនួនមុខចូលសមរម្យបំផុតសម្រាប់រោងចក្រក្តារបន្ទះក្រុមហ៊ុន Kingwood : *ឈើទាល* (ឈើយកជ័រ) *ផ្ដៀក* និងប្រភេទពូជកម្រិតពាណិជ្ជកម្មផ្សេងទៀត ។ ដោយបានកាប់រំលំដើមឈើក្រុមរបស់ សេង កុកហ៊ាង បន្ទាប់មកបានយកឈើចូលក្នុងព្រំប្រទល់ចំការ ដែលពួកគេអាចបង្ហាញថា ជាផលិតផលរបស់ដំណើរការផ្ទេរដីដែលបានទទួលការអនុញ្ញាត[១៤៦] ។ រូបមន្តរបស់ទីរីង-ការឈូសសំអាត-កាប់រំលំព្រៃឈើមានតម្លៃ ដែលបានយល់ព្រមស្របច្បាប់ - ផ្តល់ឱ្យនូវទំហំសម្រាប់ការលាងឈើកាប់ខុសច្បាប់ដោយមិនកំណត់ ។

៣.៤ ការប្រមូលអុស

ជាមួយគម្រោងដាំដើមកៅស៊ូដែលផ្តល់ការគាំទ្រនយោបាយពីកម្រិតខ្ពស់បំផុត ក្រុមកាប់ឈើអាចលួចដោយខុសច្បាប់នូវដើមឡោះ និងដើមឈើរបស់អ្នកភូមិដែលនៅខាងក្រៅព្រំប្រទល់ចំការដោយគ្មានទោសពៃរ៍ ។ ទោះយ៉ាងណាក៏ដោយ ក្នុងបរិបទនៃការបញ្ឈប់ការដឹកឈើថ្នាក់ជាតិ ក្រុមនេះបានប្រើប្រាស់វិធីសាស្ត្រប្រយ័ត្នប្រយែងកាន់តែខ្លាំងឡើងចំពោះការយកឈើទៅកាន់រោងចក្រក្រុមហ៊ុន Kingwood ។ ការស៊ើបអង្កេតដោយបុគ្គលិក Global Witness ក្នុងខែ មករា ឆ្នាំ ២០០៣ បានបង្ហាញថា ការផ្គត់ផ្គង់ឈើរបស់រោងចក្រមកពីទីរីងតែក្រោយពីមេឃងងឹតប៉ុណ្ណោះ ជាមធ្យមពី៦-៧ឡានក្នុងមួយយប់[១៤៧] ។ ស្របពេលនេះ ក៏ស្នូមអរគុណដល់លិខិតអនុញ្ញាតបន្លំ ដែលផ្តល់ដោយរដ្ឋបាលព្រៃឈើ ការដឹកកំណាត់ឈើប្រវែងពីរម៉ែត្រចំនួន៦០ ម៉ែ" ដោយក្លែងលក្ខណៈខាងក្រៅថាជា "អុស"[១៤៨] ។ក្នុងការបង្ហាញរបស់ការិយាល័យស្នងការជាន់ខ្ពស់សិទ្ធិមនុស្សនៃអង្គការសហប្រជាជាតិបានឱ្យដឹងថា :

"អ្នកតំណាងពិសេសឱ្យអ្នកតំណាងពិសេសសិទ្ធិមនុស្សរបស់អគ្គលេខាធិការអង្គការសហប្រជាជាតិក្នុងប្រទេសកម្ពុជា Peter Leuprecht បានទៅកាន់ឃុំទីរីង ក្នុងខែ កក្កដា ឆ្នាំ ២០០៣... នៅពេលជួបជាមួយមន្ត្រីរដ្ឋបាលព្រៃឈើក្នុងមូលដ្ឋាន គាត់បានធ្វើសាក្សីដោយផ្ទាល់ខ្លួនពីការដឹកជញ្ជូនដើមឈើធំៗប្រាំឡាន ដែលរួមមានទាំងឈើយកជ័រផងដែរ ។ នៅពេលដែលគាត់បានសួរពីបញ្ហានេះ គាត់ត្រូវបានបង្ហាញនូវលិខិតអនុញ្ញាតដឹកអុស ។"[១៤៩]

លិខិតអនុញ្ញាតដឹកអុស បានផ្តល់ឱ្យមិនត្រឹមតែលេសដឹកឈើជាឯកសារប៉ុណ្ណោះទេ ថែមទាំងសមត្ថភាពសម្រាប់ការលួចពន្ធផងដែរ ។ ស្របពេលដែលអត្រាសួយសារសម្រាប់ *ឈើទាល* កម្រិតលេខពីរ និង *ឈើផ្ដៀក* ដែលបានដឹកចេញពីទីរីងមានចំនួន US$៥៤ ក្នុងមួយម៉ែត្រគូប អត្រាសម្រាប់អុសគឺត្រឹមតែ US$ ១ ប៉ុណ្ណោះ ។ ដោយផ្អែកតាមដំណើររឿងពីបុគ្គលិកក្នុងខេត្តកំពង់ធំ និងការស៊ើបអង្កេតរបស់Global-Witness លើឡានដែលទៅដល់រោងចក្រក្រុមហ៊ុន Kingwood ក្នុងឆ្នាំ២០០៣បង្ហាញថាក្រុមហ៊ុនSengKeangCompany បានដឹកជញ្ជូនឈើកម្រិតលេខពីរតិចបំផុត ២០,០០០ម៉ែ" ចេញពីទីរីងក្នុងឆ្នាំនោះតែមួយឆ្នាំគត់[១៥០] ។នេះបង្ហាញថាក្នុងឆ្នាំ២០០៣ ក្រុមហ៊ុនគួរតែបានផ្តល់ឱ្យយ៉ាងហោចណាស់ សួយសារចំនួន US$១,០០០,០០០ ដល់រតនាគារប្រទេសកម្ពុជា ។ ទោះយ៉ាងណាក៏ដោយ ក្នុងឆ្នាំ ២០០៦ ចាន់ សារុន បានបញ្ជាក់ថា ក្នុងរយៈពេលបីឆ្នាំនេះ ក្រុមហ៊ុន Seng Keang Company បានបង់ឱ្យរដ្ឋាភិបាលនូវសួយសារឈើសរុបតិចជាង US$៦០០,០០០ ។ ចម្ងល់ពីពន្ធចំនួនប៉ុន្មានដែលក្រុមកាប់ឈើ គួរតែបានបង់ ត្រូវបានពិនិត្យកាន់តែលំអិតក្នុងផ្នែក ៤.៦[១៥១] ។

ដោយផ្តល់យោបល់ទៅលើការកាប់ឈើជុំវិញទីរីងក្នុងខែ កញ្ញា ឆ្នាំ ២០០៣ មន្ត្រីម្នាក់នៅក្នុងមន្ទីររុក្ខាប្រមាញ់ខេត្តកំពង់ធំបានបញ្ជាក់ថា "ក្រសួងកសិកម្មបានផ្តល់អាជ្ញាប័ណ្ណឱ្យអ្នកស្រី សេង គាង ប្រមូលកំណាត់ឈើសម្រាប់ធ្វើអុសតាំងពីចុង ឆ្នាំ២០០២ មកម្ល៉េះ"[១៥២] ។ស្របពេលនេះដែរ ទី សុគន្ធ ប្រធានរដ្ឋបាលព្រៃឈើដែលជាកូនប្រសាររបស់ ឃុន ថុង បានប្រកាសថា "គ្មានការដឹកឈើទៀតទេ ។ ប្រជាជនមួយចំនួនប្រើប្រាស់ឈើជាអុស ។ ប្រសិនបើមានកំណាត់ឈើនៅខាងក្រៅចំការ យើងនឹងចាត់វិធានការណ៍បំបាត់ ។ គ្មានការធ្វើអាជីវកម្មឈើទៀតទេ ។ អាចមានការឈូសសំអាតសម្រាប់ធ្វើស្រែ ។" គាត់បានបដិសេធថាធ្លាប់ស្គាល់ សេង គាង និង ឌី ចូច[១៥៣] ។

ដោយសរសេរលិខិតមួយទៅកាន់ក្រុមការងារគ្រប់គ្រងធនធានធម្មជាតិ ដែលជាម្ចាស់ជំនួយអន្តរជាតិនៅក្នុងខែតែមួយនេះ ចាន់ សារុន ជាប្អូនថ្លៃរបស់ ឃុន ថុង បានអះអាងថា "មកទល់ថ្ងៃនេះ ចំពោះការដឹកជញ្ជូនឈើដែលបាននិយាយ ក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ បន្តអនុវត្តការបញ្ឈប់បម្រាមធ្វើអាជីវកម្ម និងការដឹកជញ្ជូនឈើឱ្យមានប្រសិទ្ធិភាព"[១៥៤] ។ បុគ្គលិករបស់ សេង គាង បានជូនដំណឹងដល់ដៃគូអាជីវកម្មក្នុងឆ្នាំ ២០០៤ ថា ក្រុមនេះកំពុងបន្តទទួលបានលិខិតអនុញ្ញាតដឹកអុសពីរដ្ឋបាលព្រៃឈើ[១៥៥] ។

៣.៥ អត្ថប្រយោជន៍បន្ថែមទៀត

ក្នុងខែ កញ្ញា ឆ្នាំ២០០៤ ប៉ុន្មានសប្តាហ៍បន្ទាប់ពីការបង្កើតរដ្ឋាភិបាលដឹកនាំដោយគណបក្សប្រជាជនថ្មីមួយ ហើយនិងការតែងតាំងជាថ្មីរបស់គាត់ជារដ្ឋមន្ត្រីក្រសួងកសិកម្ម រុក្ខាប្រមាញ់ និងនេសាទ ចាន់ សារុន បានចេញ*ប្រកាស*មួយផ្តល់សិទ្ធិឱ្យក្រុមហ៊ុន Seng Keang Company បង្កើតរោងចក្រនៅក្នុងភូមិខៃស័ក្នុងទម្រង់សម្រាប់ធ្វើរោងចក្រឈើ និងក្តារបន្ទះ[១៥៦] ។ *ប្រកាស*នេះផ្ទុយនឹងអនុក្រឹត្យឆ្នាំ១៩៩៩ស្តីពីវិធានការណ៍រឹតបន្តឹងវិស័យវិនិយោគ ដែលហាមប្រាមការវិនិយោគបន្ថែមក្នុងការកែច្នៃឈើមូល[១៥៧] ។ *ប្រកាស*ក៏បានបំពានផងដែរ ទៅលើច្បាប់ព្រៃឈើឆ្នាំ ២០០២ មាត្រា ៣០ ដែលចែងថា គ្មានរោងចក្រកែច្នៃណាមួយ អាចត្រូវបានបង្កើតឡើងក្នុងចម្ងាយប្រាំគីឡូម៉ែត្រពីព្រៃបម្រុងអចិន្ត្រៃយ៍បានឡើយ ។ ច្បាប់ព្រៃឈើក៏ចែងបន្ថែមថា "ក្រសួងកសិកម្ម រុក្ខា-ប្រមាញ់ និងនេសាទ អាចផ្តល់ឱ្យការលើកលែងចំពោះការហាមប្រាម (ទាំងនេះ) ប្រសិនបើការសិក្សាដោយរដ្ឋបាលព្រៃឈើអាចបង្ហាញថា គុណប្រយោជន៍ពីការលើកលែងនេះនឹងមិនបណ្តាលខូចខាតឬមានផលប៉ះពាល់ដល់បរិស្ថាន និងសង្គមកម្រិតតូច" ។ ប្រកាសរបស់ ចាន់ សារុន មិនបានធ្វើការសំអាងណាមួយលើការសិក្សាបែបនេះ ហើយមន្ត្រីរដ្ឋបាលព្រៃឈើដែលមានមូលដ្ឋាននៅទីរីង បានជូនដំណឹងដល់ Global Witness ក្នុងឆ្នាំ ២០០៥ ថា គ្មានការសិក្សាណាមួយត្រូវបានធ្វើឡើងឡើយ[១៥៨] ។

ប្រកាសចុះហត្ថលេខាដោយ ចាន់ សារុន អនុញ្ញាតឱ្យក្រុមហ៊ុន Seng Keang Company សាងសង់រោងចក្រកែច្នៃឈើក្នុងភូមិខៃស័

ការវាយតម្លៃផលប៉ះពាល់បរិស្ថាន និងសង្គម ដែលអាចជឿជាក់បាន និងច្បាស់ណាស់បង្ហាញពីការកាប់ឈើបំផ្លិចបំផ្លាញ និងខុសច្បាប់ដោយក្រុមហ៊ុន Seng Keang Company ។ ទោះយ៉ាងណាក៏ដោយ ត្រឹមពាក់កណ្តាលឆ្នាំ២០០៤ ទីរីងបានទាក់ទាញចំណាប់អារម្មណ៍រួចទៅហើយ ចំពោះការបំផ្លាញបរិស្ថាន ការបាត់បង់ចំណូលគ្រួសារ ការបំផ្លិចបំផ្លាញទ្រព្យសម្បត្តិវប្បធម៌ និងការបំភិតបំភ័យ ដែលកំពុងត្រូវបានធ្វើទៅលើប្រជាជនរបស់ខ្លួន ។ Global Witness អង្គការក្រៅរដ្ឋាភិបាលផ្សេងៗ និងអ្នកកាសែត មិនរាប់បញ្ចូលអ្នកស្រុកក្នុងមូលដ្ឋានខ្លួនឯងផង បានបង្ហាញដល់អាជ្ញាធរនូវភស្តុតាងយ៉ាងច្រើនពីអ្វីដែលកំពុងកើតឡើង[១៥៩] ។ ដោយសន្មតថា ចាន់ សារុន កំពុងអនុវត្តតួនាទីក្រសួងរបស់គាត់បានយ៉ាងមានសមត្ថភាព គាត់ប្រាកដជាបានដឹងយ៉ាងពេញលេញពីព័ត៌មាននេះ ។ ក្នុងគ្រប់លទ្ធភាពទាំងអស់ គាត់គ្រាន់តែបានជ្រើសរើសយកបដិសេធប៉ុណ្ណោះ ។

ការកែច្នៃដើមឈើថា "អុស"

អុសកំពុងដឹកជញ្ជូន

រោងចក្រអារឈើរបស់ក្រុមហ៊ុន Seng Keang Company និងរោងចក្រផលិតឈើបន្ទះក្នុងភូមិខៃស័ ខែ វិច្ឆិកា ឆ្នាំ ២០០៥

តនៅលេខក្រោយ

## តមកពីទំព័រទី ៩ ការបោះឆ្នោតជិតមកដល់ហើយ...

បុរសភាគច្រើនហើយ ការពិតគឺថា បុរសនៅក្នុងប្រទេសកម្ពុជាមានប្រាក់ច្រើន និងមានអំណាច ។

លោក គល់ បញ្ញា មានប្រសាសន៍ថា ដោយខ្វះការយល់ដឹង និងការស្វែងយល់ពីតម្រូវការក្នុងការឱ្យមានតុល្យភាពយេនឌ័របានសមរម្យជាងនេះ នៅពេលធ្វើការសម្រេចចិត្តធ្វើឱ្យចំនួនដែលមានតិចនោះកាន់តែបាក់ទឹកចិត្ត ។

លោកបានបន្ថែមថា ខ្ញុំគិតថា គណបក្សនយោបាយមិនមានឆន្ទៈ ពិតប្រាកដក្នុងការដាក់បេក្ខជនជាស្ត្រីតែម្តង ។

លោកបានមានប្រសាសន៍ថា យើងបានសន្យាប្រាប់ពិភពលោកថា នឹងឆ្លើយតបទៅនឹងគោលដៅអភិវឌ្ឍន៍សហស្សវត្សរ៍ក្នុងការសម្រេចឱ្យបានតំណាងរាស្ត្រជាស្ត្រីចំនួន៣០ភាគរយ ដូច្នេះនេះគឺជាការប្តេជ្ញាចិត្តរបស់យើង ហើយយើងគិតថា ការសម្រេចចិត្តគួរតែមានស្ត្រីចូលរួមដែលអាចធ្វើឱ្យការសម្រេចចិត្តបានត្រឹមត្រូវជាង ។

លោកស្រី មូរ សុខហួរ បេក្ខជនរបស់គណបក្សសង្គ្រោះជាតិ ដែលជាអតីតសមាជិកសភាគណបក្សសមរង្ស៊ី និងជាអតីតរដ្ឋមន្ត្រីក្រសួងកិច្ចការនារី បានមានប្រសាសន៍ថា មិនមានបេក្ខជនជាស្ត្រីច្រើនមកឈរឈ្មោះក្នុងការបោះឆ្នោតទេ បើទោះជាគណបក្សមានការខិតខំប្រឹងប្រែងដាក់បញ្ចូលពួកគាត់ក៏ដោយ ។

លោកស្រីបានមានប្រសាសន៍បន្តថា មានហេតុផលច្រើន( ហេតុផលអ្វីបានជាមានស្ត្រីមិនគ្រប់គ្រាន់មកចុះឈ្មោះ) ។ គណបក្សរបស់យើងបានព្យាយាមដាក់បេក្ខជនជាស្ត្រី ។ ប៉ុន្តែយើងគិតថា ពួកគាត់ដែលមានគុណសម្បត្តិគ្រប់គ្រាន់នោះមិនចង់ចូលរួមប្រកួតប្រជែងក្នុងតួនាទីដ៏ខ្ពស់នោះឡើយ ។

លោកស្រីបានបន្តថា នេះគឺជាគោលដៅមួយក្នុងចំណោមគោលដៅអភិវឌ្ឍន៍សហស្សវត្សរ៍ដែលប្រទេសកម្ពុជា មិនអាចឆ្លើយតបបាន ។ មិនមានការគាំទ្រគ្រប់គ្រាន់ពីសង្គម ឬរដ្ឋាភិបាល ដែលលើកឡើងថា ស្ត្រីអាចធ្វើអ្វីផ្សេងពីនេះ ។

មន្ត្រីគណបក្សនេះបានឱ្យដឹងថា កាលពីថ្ងៃព្រហស្បតិ៍លោកស្រី មូរ សុខហួរ បានធ្វើជាសហប្រធានកិច្ចប្រជុំរបស់គណបក្សសង្គ្រោះជាតិ ដែលនៅក្នុងនោះកម្មវិធីនយោបាយគណបក្សស្តីពីស្ត្រីដែលត្រូវបានពិភាក្សានោះ គឺការគាំពារសុខភាពផ្លូវកាយ ផ្លូវចិត្ត និងសុខភាពបន្តពូជរបស់ស្ត្រី គឺជាអាទិភាព ។

នៅឯកិច្ចពិភាក្សានោះ លោកស្រី គឹម ណាតស៊ីម បេក្ខជនបម្រុងរបស់គណបក្សសង្គ្រោះជាតិមណ្ឌលកំពង់ស្ពឺ បានមានប្រសាសន៍ថា ប្រាក់អាចជាឧបស័គ្គដ៏សំខាន់ចំពោះស្ត្រី ដែលចង់ឈរឈ្មោះឆ្នោតពីព្រោះពួកគាត់ត្រូវចំណាយប្រាក់ធ្វើយុទ្ធការដោយខ្លួនឯង ។

លោកស្រីបានមានប្រសាសន៍ថា "ខ្ញុំគិតថាខ្ញុំសកម្មជន និងមានប្រជាប្រិយ៍ភាពគ្រប់គ្រាន់ ប៉ុន្តែខ្ញុំមិនមានប្រាក់ច្រើនសម្រាប់ចំណាយពេលធ្វើយុទ្ធនាការឃោសនាឡើយ" ។

លោកស្រី រស់ សុភាព អនុប្រធានគណកម្មាធិការលើកកម្ពស់ស្ត្រីក្នុងឆាកនយោបាយ(CPWP) បានមានប្រសាសន៍ថា ការខកខានមិនបានចុះឈ្មោះស្ត្រីឱ្យបានច្រើន គឺជាការខកចិត្ត និងករបាត់បង់ឱកាសក្នុងការធ្វើឱ្យមានតុល្យភាពយេនឌ័រឡើងវិញ ហើយផ្តោតបន្ថែមទៀតទៅលើសុខភាព និងការអប់រំនៅក្នុងតួនាទីក្នុងការធ្វើសេចក្តីសម្រេច ។

លោកស្រី រស់ សុភាព បានបន្តថា តាមរយៈការពិភាក្សារបស់ពួកយើង ហើយវេទិកាបានរកឃើញថា សូម្បីស្ត្រីវ័យក្មេងដែលមានចំណេះដឹងខ្ពង់ខ្ពស់ទទួលបានការផ្តល់ដំបូន្មាន ពីក្រុមគ្រួសាររបស់ខ្លួនកុំឱ្យប្រឡូកក្នុងនយោបាយពីព្រោះវាជាបញ្ហាគ្រោះថ្នាក់សម្រាប់សង្គមនៅពេលនេះ ។

លោកស្រី ហូ ណូន សមាជិកសភាគណបក្សប្រជាជនកម្ពុជា បានមានប្រសាសន៍ថា លោកស្រីគិតថា គណបក្សប្រជាជនកម្ពុជា បានទទួលជោគជ័យដោយមានស្ត្រីកាន់តែច្រើនចូលរួមក្នុងនយោបាយ ប៉ុន្តែបានបន្ថែមថា ស្ត្រីគួរតែពង្រឹងសមត្ថភាពរបស់ខ្លួន ដូច្នេះពួកគាត់អាចចូលរួមបាន តែជួនកាលស្ត្រីខ្លួនឯងមិនមានទំនុកចិត្តគ្រប់គ្រាន់តែម្តង ៕

# ទស្សនាបឹង យក្សឡោម ខេត្តរតនៈគិរី





ខេត្តរតនៈគិរីជាខេត្តនៅភាគឦសាននៃប្រទេសកម្ពុជាមានផ្ទៃដីសរុប១០.៧៨២ការ៉េ មានប្រជាពលរដ្ឋ៩៤.២៤៣នាក់ ប្រជាពលរដ្ឋដែលរស់នៅខេត្តនេះ៨០ភាគរយជាជនជាតិភាគតិច ។ ទីក្រុងរបស់ខេត្ត គឺបានលុងដែលស្ថិតនៅកណ្តាលខ្ពង់រាបមានចម្ងាយ៥៨៦គីឡូម៉ែត្រពីរាជធានីភ្នំពេញ ខេត្តចែកចេញជា៩ស្រុក ។ ខេត្តរតនគិរីជាគោលដៅទេសចរណ៍ដ៏មានប្រជាប្រិយ និងទាក់ទាញភ្ញៀវទេសចរជាតិ និងបរទេសរាប់ពាន់រាប់ម៉ឺននាក់ជារៀងរាល់ឆ្នាំឱ្យទៅលម្ហែកាយ និងទស្សនាខេត្តនេះ ។ សណ្ឋាគារធំៗជាច្រើន និងផ្ទះសំណាក់រាប់មិនអស់ព្រមទាំងមានភោជនីយដ្ឋាន និងហាងទំនិញត្រូវបានរីកដុះដាលដូចផ្សិតដើម្បីឆ្លើយតបនឹងកំណើនទេសចរដែលសម្រុកចូលមកទស្សនាខេត្តដែលសម្បូរធនធានធម្មជាតិ រមណីយដ្ឋានទេសចរណ៍ធម្មជាតិទឹកធ្លាក់ធម្មជាតិ និងវប្បធម៌ជនជាតិដើមគួរឱ្យទាក់ទាញ ។ ដោយសារតែខេត្តមានសក្តានុពលទេសចរណ៍យ៉ាងនេះហើយ ទើបរាជរដ្ឋាភិបាលបានចាត់ទុកខេត្តរតនគិរី និងបណ្តាខេត្តភូមិភាគឦសានមួយចំនួនទៀតជាប៉ូលទេសចរណ៍សំខាន់ទី៤ នៃព្រះរាជាណាចក្រកម្ពុជា ។ តំបន់ទេសចរណ៍គួរឱ្យទាក់ទាញទាំងនោះរួមមាន :

### បឹងយក្សឡោម

បឹងយក្សឡោមជាបឹងមួយស្ថិតនៅចំកណ្តាលភ្នំមួយក្នុងឃុំយក្សឡោម ស្រុកបានលុង ជារមណីយដ្ឋានធម្មជាតិដ៏ស្រស់ត្រកាលគ្មានពីរក្នុងប្រទេសដែលបានកើតឡើងដោយសារបន្ទុះភ្នំភ្លើងតាំងពីជាង ៤.០០០ ឆ្នាំមុនមកម្ល៉េះ ។ ទិដ្ឋភាពក្នុងបឹងយក្សឡោមមើលទៅដាច់កន្ទុយភ្នែក មានព្រៃព្រឹក្សាដុះអមជុំវិញបឹងដែលជាម្លប់សម្រាប់កម្សាន្ត រីឯផ្ទៃទឹកមានពណ៌ ខៀវស្រងាត់ ទឹកត្រជាក់ថ្លាយង់ស្ទើរតែអាចឆ្លុះមុខបាន រហូតធ្វើឱ្យអ្នកទស្សនាមិនចង់ឃ្លាតពីកន្លែងនេះឡើយ ។ រមណីយដ្ឋានបឹងយក្សឡោមមានចម្ងាយប្រមាណ ៨គីឡូម៉ែត្រពីទីក្រុងបានលុង ។ បឹងនេះមានបរិមាណ ២.៦១២ម៉ែត្រ ដែលមានអង្កត់ផ្ចិត ៨០០ម៉ែត្រ និងជម្រៅ៥០ម៉ែត្រ ។ ទៅដល់បឹងយក្សឡោមភ្លាមនៅពីមុខត្រូវបានគេដាក់បារ៉ាសឱ្យឈប់ដើម្បីបង់ប្រាក់មុននឹងចូលទៅកម្សាន្តនៅទីនោះ ។ សំបុត្រចូលទស្សនាសម្រាប់ខ្មែរ ៣០០ រៀល បរទេស១ដុល្លារ ម៉ូតូ៥០០រៀល រថយន្តតូច១.៥០០រៀល រថយន្តធំ ២.០០០ រៀល និងកង់៣.០០រៀល ។ នៅទីនោះក្នុងអំឡុងពេលបុណ្យចូលឆ្នាំខ្មែរ និង បុណ្យជាតិធំៗម្តងៗគឺមានសភាពអ៊ូអរខ្លាំងណាស់ស្ទើរតែគ្មានកន្លែងចតម៉ូតូរថយន្ត។ ភ្ញៀវទេសចរម្នាក់ៗពេលដែលទៅដល់បឹងនេះភ្លាមគេប្រញាប់ប្រញាល់ផ្លាស់សម្លៀកបំពាក់ និងទាញម៉ាស៊ីនថតដើម្បីទៅហែលទឹក និងថតរូបទុកជាអនុស្សាវរីយ៍បង្អួតមិត្តភក្តិបងប្អូន ។ ភ្ញៀវទេសចរខ្លះដែលមិនទាន់ចុះមុជទឹកពួកគេនាំគ្នាដើរជុំវិញបឹងនេះដើម្បីគយគន់ទេសភាពភាគច្រើនអ្នកដែលទៅទស្សនា និងទៅងូតទឹកនៅទីនោះគឺនៅពេលរសៀលម៉ោងពីរ ឬម៉ោងបីពីព្រោះពេលព្រឹកគេនាំគ្នាទៅកម្សាន្តនៅទឹកជ្រោះផ្សេងៗកាលពីមុនប្រជាពលរដ្ឋរស់នៅជុំវិញបឹងយក្សឡោមមានជំនឿថា បឹងនេះមានអារក្ខទឹក និងអារក្ខភ្នំថែរក្សាការពារពួកគេមិនហ៊ានកាប់ឆ្ការព្រៃនៅទីនោះឡើយ ព្រោះខ្លាចបង្កគ្រោះថ្នាក់ដល់ពួកគេជាងនេះទៅទៀតពេលដែលកូនចៅរបស់ពួកគេមានជំងឺម្តងៗពួកគេតែងយកជ្រូក មាន់ ទា ទៅសែនដើម្បីសុំសេចក្តីសុខ តែពេលនេះជំនឿទាំងអស់នោះត្រូវបានសាបរលាបអស់ទៅហើយ ដោយគេគ្រាន់តែទុកទីនោះជាកន្លែងរមណីយដ្ឋានសម្រាប់កម្សាន្តប៉ុណ្ណោះ ៕





ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សៅរ៍ ទី១៨ ខែ ឧសភា ឆ្នាំ២០១៣

## As Elections Loom, a Lack of Female Candidates on the Ballot

By IAUREN CROTHERS
AND KAiNG M ENGHUN
THE CAMBODIA DAilY

Cambodia looks set to fail its Millennium Development Goal (MDG) of increasing representation of women in the National Assembly after the political parties contesting the July 28 national elections registered fewer-than hoped female candidates.

The MDG on promoting gender equality and the empowerment of women says that the National Assembly needs to have a higher proportion of female representatives, and set a target of 30 percent by 2015. Under the current government, only 21 percent of National Assembly lawmakers are female, according to U.N. figures, and the forthcoming ballot is the last chance for Can1bodia to meet the Millennium goal by 2015, as each government mandate lasts five years.

While each of the eight parties taking part in the election put forward an average of 260 candidates and reserve candidates, men feature far more prominently than women and of those registered, only a handful of women were put at the top of the voting lists. Placement on the list affects the outcome in terms of gender representation, because when a party wins seats in a constituency, they are given first to candidates at the top of the ballot list. Those listed further down the list have much less chance of gaining a seat, unless a party wins multiple seats in a single constituency.

According to official figures provided by the National Election Committee (NEC), the ruling Cambodian People's Party registered 20 women with another 28 in reserve, Funcinpec registered 12 female candidates with 19 in reserve and the joint-opposition Cambodia National Rescue Party (CNRP) registered only 12 female candidates with 19 in reserve. Even the little-known Leagues for Democracy party did better than the main opposition, registering 15 women candidates and placing a further 36 on the reserve list. The county's smallest parties-the Cambodian Nationality Party registered 21 women and 34 in reserve, while the Republic Democracy Party put forward 37 women candidates and 52 in reserve.

Similar figures for the Khmer Anti-Poverty Party and the Khmer Economic Development Party have not been made available yet.

At the top of the ballot lists, the numbers of women shrink even further. Of women candidates in the number one spot, the CPP has two, the CNRP has four, Funcinpec has three and the Leagues for Democracy has three. The Cambodian Nationality Party has one.

'There are less female candidates than previous elections," said Koul Panha, executive director of the Committee for Free and Fair Elections in Cambodia (Comfrel), adding that he estimates only 15 percent of lawmakers would be women in the next government mandate. 'Tm really concerned that they did not reach the same number of current female parliamentarians," Mr. Panha said.

One of the reasons for this, he opined, was a focus on the fierce competition that has raged between the CPP and opposition CNRP. But another explanation may be the male-dominated political landscape, and the fact that men in Can1bodia have most of the money and power. Coupled with a lack of awareness and understanding of the need to have a fairer gender balance at a decision-making level makes the low numbers "very discouraging," Mr. Pru1ha said."I think the political parties have no real willingness to put females in as candidates," he added. 'We promised to the world to meet the Millennium Development Goal to reach 30 percent of females in Parliament, so this is our commitment, and we think that decision-making should include females that can make more right decisions," he said. CNRP election candidate Mu Sochua, who was formerly a lawmaker for the SRP and the minister of women's affairs, said not many women came forward to stand in the election despite an effort by the party to include them.

'There are many reasons [why not enough women are registered]," Ms. Sochua said. "Our party has tried to identity women, but the ones we feel were qualified did not want to be part of the fight for a higher position. 'This is one of the MDGs that will not be met by Cambodia. **Continued on page15**

## ការបោះឆ្នោតជិតមកដល់ហើយ ប៉ុន្តែនៅតែមិនសូវមានបេក្ខជនជាស្ត្រី

**ខេមបូឌា ដេលី**

កម្ពុជាហាក់បីដូចជាមិនអាចសម្រេចបាននូវគោលដៅអភិវឌ្ឍន៍សហស្សសត្សវ៍របស់ខ្លួនក្នុងបង្កើតតំណាងរាស្ត្រជាស្ត្រីនៅក្នុងរដ្ឋសភានោះទេ បន្ទាប់ពីគណបក្សនយោបាយដែលចូលរួមប្រកួតប្រជែងក្នុងការបោះឆ្នោតជាតិនៅថ្ងៃទី២៨ខែកក្កដា បានចុះឈ្មោះបេក្ខជនជាស្ត្រីតិចជាងការរំពឹងទុកនោះ។

គោលដៅអភិវឌ្ឍន៍សហស្សវត្សរ៍ស្តីពីការលើកកម្ពស់សមភាពយេនឌ័រ និងការផ្តល់អំណាចដល់ស្ត្រីលើកឡើងថា រដ្ឋសភាចាំបាច់ត្រូវមានតំណាងរាស្ត្រជាស្ត្រីឱ្យច្រើនជាងនេះ ហើយដាក់ទិសដៅឱ្យបាន៣០ភាគរយនៅឆ្នាំ២០១៥។

យោងតាមតួរលេខរបស់អង្គការសហប្រជាជាតិបានឱ្យដឹងថា ស្ថិតនៅក្រោមការគ្រប់គ្រងរបស់រដ្ឋាភិបាលបច្ចុប្បន្ន មានសមាជិកសភាជាស្ត្រីតែ២១ភាគរយប៉ុណ្ណោះ ក្នុងចំណោមសមាជិកសភាទាំងអស់ ហើយការបោះឆ្នោតនាពេលខាងមុខ គឺជាឱកាសចុងក្រោយសម្រាប់ប្រទេសកម្ពុជា ក្នុងការឆ្លើយតបទៅនឹងគោលដៅនៃការអភិវឌ្ឍន៍សហស្សវត្សរ៍ឆ្នាំ២០១៥ ពីព្រោះអណត្តិរបស់រដ្ឋាភិបាលក្នុងមួយអណត្តិៗមាន៥ឆ្នាំ។

ខណៈដែលមានគណបក្សចំនួន៨ចូលរួមប្រកួតប្រជែងក្នុងការបោះឆ្នោតបានដាក់បេក្ខជន និងបេក្ខជនបម្រុងជាមធ្យម២៦០នាក់នោះ បេក្ខជនជាបុរសមានច្រើនជាងស្ត្រីឆ្ងាយណាស់ ហើយក្នុងចំណោមបេក្ខជនដែលបានចុះឈ្មោះនោះ បេក្ខជនជាស្ត្រីមានចំនួនតិចតួចត្រូវបានដាក់ឈ្មោះនៅលើគេក្នុងបញ្ជីបោះឆ្នោត។

បេក្ខជននៅក្នុងបញ្ជីនោះធ្វើឱ្យប៉ះពាល់ដល់លទ្ធផលដោយសារតំណាងយេនឌ័រពីព្រោះនៅពេលគណបក្សមួយឈ្នះឆ្នោតអាសនៈច្រើនក្នុងមណ្ឌលមួយអាសនៈនោះត្រូវផ្តល់ទៅឱ្យបេក្ខជនដែលមានឈ្មោះនៅលើគេក្នុងបញ្ជីឈ្មោះបោះឆ្នោតនោះមុនគេ។ អ្នកដែលមានឈ្មោះក្រោមមានឱកាសតិចជាងឆ្ងាយណាស់ក្នុងការទទួលបានអាសនៈ លុះណាតែគណបក្សឈ្នះអាសនៈ ច្រើននៅក្នុងមណ្ឌលតែមួយ។

យោងតាមតួរលេខផ្លូវការដែលផ្តល់ដោយគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត(គ.ជ.ប)បានឱ្យដឹងថា គណបក្សប្រជាជនកម្ពុជា កំពង់កាន់អំណាច បានចុះឈ្មោះបេក្ខជនជាស្ត្រីចំនួន២០រូប និងបេក្ខជនបម្រុងចំនួន២៨រូប គណបក្សហ្វ៊ុនស៊ិនប៉ិចបានចុះឈ្មោះបេក្ខជនជាស្ត្រីចំនួន១២រូប និងបេក្ខជនបម្រុង១៩រូប និងគណបក្សសង្គ្រោះជាតិជាគណបក្សប្រឆាំងច្របាច់បញ្ចូលគ្នា បានចុះឈ្មោះជាស្ត្រីចំនួនតែ១២រូប និងបេក្ខជនបម្រុង១៩រូបប៉ុណ្ណោះ។

សូម្បីតែគណបក្សសម្ព័ន្ធប្រជាធិបតេយ្យដែលគេមិនសូវស្គាល់ផងនោះ ធ្វើបានល្អជាគណបក្សដ៏ធំមួយនេះទៅទៀត ដោយចុះឈ្មោះជាស្ត្រីបានចំនួន១៥រូប និងដាក់បេក្ខជនបម្រុងបានចំនួន៣៦រូបឯណោះ ចំណែកឯគណបក្សតូចជាតិគេក្នុងប្រទេសកម្ពុជា គឺគណបក្សសញ្ជាតិខ្មែរ បានចុះឈ្មោះបេក្ខជនជាស្ត្រីចំនួន២១រូប និងបេក្ខជនបម្រុង៣៤រូប រីឯគណបក្សសាធារណរដ្ឋប្រជាធិបតេយ្យបានដាក់បេក្ខជនជាស្ត្រីចំនួន៣៧រូប និងបេក្ខជនបម្រុង៥២រូប។

តួរលេខស្រដៀងគ្នានេះ សម្រាប់គណបក្សខ្មែរឈប់ក្រ និងគណបក្សអភិវឌ្ឍន៍សេដ្ឋកិច្ចខ្មែរ មិនទាន់បានចុះឈ្មោះបេក្ខជននៅឡើយទេ។

នៅក្នុងបញ្ជីឈ្មោះបេក្ខជនតំណាងរាស្រ្តដែលស្ថិតនៅលើគេចំនួនស្ត្រីថយចុះជាងមុនច្រើនណាស់ ។ នៅក្នុងចំណោមបេក្ខជនជាស្ត្រីដែលមានឈ្មោះនៅលើគេគណបក្សប្រជាជនកម្ពុជាមាន២រូប គណបក្សសង្គ្រោះជាតិមាន៤រូប គណបក្សហ្វ៊ុនស៊ិនប៉ិចមាន៣រូប គណបក្សសម្ព័ន្ធប្រជាធិបតេយ្យមាន៣រូប ។ គណបក្សសញ្ជាតិខ្មែរមាន១រូប។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណកម្មាធិការសម្រាប់ការបោះឆ្នោតដោយសេរី និងយុត្តិធម៌នៅកម្ពុជា (ខុមហ្វ្រែល)បានមានប្រសាសន៍ថា "មានបេក្ខជនជាស្ត្រីតិចជាងការបោះឆ្នោតមុនៗ"។

លោកបានមានប្រសាសន៍បន្ថែមទៀតថា លោកប៉ាន់ប្រមាណថា មានបេក្ខជនជាស្ត្រីចំនួនតែ១៥ភាគរយប៉ុណ្ណោះនៅក្នុងអណត្តិរដ្ឋាភិបាលក្រោយនេះ។

លោក គល់ បញ្ញា បានបន្តថា ខ្ញុំពិតជាមានការព្រួយបារម្ភថា បេក្ខជនជាស្ត្រីមិនអាចមានចំនួនដូចគ្នា នឹងសមាជិកសភាជាស្ត្រីបច្ចុប្បន្នទេ។

លោកបានមានប្រសាសន៍បន្តថា ហេតុផលមួយក្នុងចំណោមនោះ គឺផ្តោតទៅលើការប្រកួតប្រជែងដ៏ស្វិតស្វាញដែលបានកើតឡើង រវាងគណបក្សប្រជាជនកម្ពុជា និងគណបក្សសង្គ្រោះជាតិដែលជាគណបក្សប្រឆាំង។

ប៉ុន្តែការបកស្រាយមួយទៀតអាចជាទិដ្ឋភាពនយោបាយដែលមាន **តទៅទំព័រទី០៧**

អ្នកឧបត្ថម្ភ

# សុខភាព និងម្ហូបអាហារយើងបរិភោគ









| រំណាមនៅ | |
|---|---|
| បរិមាណបរិភោគ : បន្លែ និងសាច់ ១.៥ ពែង, បាយ ១ ពែង | |
| ពត៌មានអាហារូបត្ថម្ភ ក្នុង១ពេល | |
| កាឡូរី ៩០ | កាឡូរីបានពីខ្លាញ់ ៥ |
| | តម្លៃ % ប្រចាំថ្ងៃ |
| ខ្លាញ់សរុប ៨ មក្រ | ២% |
| ខ្លាញ់ឆ្អែត ១ ក្រ | ០% |
| កូលេស្តេរ៉ូល ៥០ មក្រ | ៧% |
| ជាតិសូឌីយ៉ូម ៤៧០ មក្រ | ១% |
| កាបូអ៊ីដ្រាត ៦២ ក្រ | ៥% |
| ជាតិសរសៃ ៦ ក្រ | ៨% |
| ស្ករ ៦ ក្រ | |
| ជាតិប្រូតេអ៊ីន ២៧ ក្រ | |
| ជាតិដែក ២.២ មក្រ | ៦% |
| ជាតិកាល់ស្យ៉ូម ៧០ មក្រ | ៣% |

*ភាគរយប្រចាំថ្ងៃផ្អែកលើអាហារ ២០០០ កាឡូរី ។ តម្លៃកាឡូរីប្រចាំថ្ងៃរបស់លោកអ្នកអាចខ្ពស់ ឬទាបជាងនេះ ផ្អែកលើកាឡូរីដែលសាពាង្គកាយត្រូវការ ។

| សម្លម្ជូរម្នាស់ (យួន) | |
|---|---|
| បរិមាណបរិភោគ : បន្លែ និងសាច់ ១.៥ ពែង, បាយ ១ ពែង | |
| ពត៌មានអាហារូបត្ថម្ភ ក្នុង១ពេល | |
| កាឡូរី ៤៨០ | កាឡូរីបានពីខ្លាញ់ ៨០ |
| | តម្លៃ % ប្រចាំថ្ងៃ |
| ខ្លាញ់សរុប ៨ មក្រ | ១៤% |
| ខ្លាញ់ឆ្អែត ១ ក្រ | ៥% |
| កូលេស្តេរ៉ូល ៥០ មក្រ | ១៧% |
| ជាតិសូឌីយ៉ូម ៤៧០ មក្រ | ២៤% |
| កាបូអ៊ីដ្រាត ៦២ ក្រ | ២៥% |
| ជាតិសរសៃ ៦ ក្រ | ៣៦% |
| ស្ករ ៦ ក្រ | |
| ជាតិប្រូតេអ៊ីន ២៧ ក្រ | |
| ជាតិដែក ២.២ មក្រ | ១៦% |
| ជាតិកាល់ស្យ៉ូម ៧០ មក្រ | ១២% |

*ភាគរយប្រចាំថ្ងៃផ្អែកលើអាហារ ២០០០ កាឡូរី ។ តម្លៃកាឡូរីប្រចាំថ្ងៃរបស់លោកអ្នកអាចខ្ពស់ ឬទាបជាងនេះ ផ្អែកលើកាឡូរីដែលសាពាង្គកាយត្រូវការ ។

Nutrition Information:
**Spring Rolls**

| Serving Size: 2 spring rolls | |
|---|---|
| Nutrition Information Per Serving | |
| Calories 180 | Calories from Fat 10 |
| | % Daily Value* |
| Total Fat 2 g | 4% |
| Saturated Fat 0 g | 0% |
| Cholesterol 40 mg | 14% |
| Sodium 70 mg | 2% |
| Total Carbohydrate 30 g | 10% |
| Dietary Fiber 2 g | 8% |

| | |
|---|---|
| Sugars 2 g | |
| Protein 12 g | |
| Iron 2.2 mg | 12% |
| Calcium 60 mg | 6% |

*Percent Daily Values are based on a 2,000 calorie diet. Your Daily Values may be higher or lower depending on your calorie needs.

Nutrition Information:
**Sweet and Sour Fish Soup**

| Serving Size: 2 cups soup, 1 cup rice | |
|---|---|
| Nutrition Information Per Serving | |
| Calories 480 | Calories from Fat 80 |
| | % Daily Value* |
| Total Fat 9 g | 14% |
| Saturated Fat 1 g | 5% |
| Cholesterol 50 mg | 17% |
| Sodium 575 mg | 24% |
| Total Carbohydrate 75 g | 25% |
| Dietary Fiber 9 g | 36% |
| Sugars 20 g | |
| Protein 29 g | |
| Iron 2.8 mg | 16% |
| Calcium 120 mg | 12% |

*Percent Daily Values are based on a 2,000 calorie diet. Your Daily Values may be higher or lower depending on your calorie needs.

***Cambodian Community Health 2010***




The Cambodian Community Health 2010 project is funded by the U.S. Department of Health and Human Services Centers for Disease Control and Prevention. This project was established in 1999 to address the health care needs of the Cambodian population and help eliminate health care disparities in the areas of Cardiovascular Disease and Diabetes.

Through the efforts of ***a coalition of health care agencies*** in the Lowell community, actions are being implemented to modify risk behaviors through learning about underlying causes of health care disparities in the Southeast Asian community. These agencies have a commitment to provide educational and outreach activities in preventing and managing Diabetes and Cardiovascular Disease.

***Lowell Community Health Center, Lead Agency:***




The Cambodian Community Health 2010 Program is made possible by a grant from the U.S. Department of Health and Human Services, Public Health Services and Centers for Disease Control and Prevention, Grant No. U50CCU/122151-04

***Central Coordinating Agency: Lowell Community Health Center***

Cambodian Mutual Assistance Association of Greater Lowell; University of Massachusetts Lowell, Center for Family, Work and Community, and School of Health and Environment; Visiting Nurse Association of Greater Lowell; Saints Memorial Medical Center; Lowell General Hospital; City of Lowell Senior Center; Greater Lawrence Family Health Center- Merrimack Valley Area Health Education Center; Saint Julie Asian Center; Massachusetts Department of Public Health, Division of Community Health Promotion; Khmer Health Advocates; Lowell Police Department; Lowell Telecommunications; and Trinity EMS.

***The Cambodian Mutual Assistance Association of Greater Lowell, Inc.***




The Cambodian Mutual Assistance Association of Greater Lowell was founded in July, 1984 to assist the large number of Cambodian refugees who were re-settled in Lowell, Massachusetts, beginning in the early 1980's. As a mutual assistance association, its emphasis is on Cambodians helping Cambodians, and on providing linguistically and culturally appropriate services to assist Cambodians to adapt and thrive in their new community while preserving their rich cultural heritage.

ចប់ដោយបរិបូរណ៍

# Red Rose RESTAURANT

ភោជនីយដ្ឋាន កុលាបក្រហម

ម្ចាស់ថ្មី _ម្ហូបឈ្ងុយឆ្ងាញ់

អញ្ជើញមកចូលរួមមិនខុសបំណងទេ សូមអរគុណ!

**Mon-Sun**
8am -8pm

សម្លម្ជូរ គ្រឿង $11.99

* ម្ហូបឆ្ងាញ់ជាងមុន តែតម្លៃនៅថោក ដូចមុនដដែល
* សេវាកម្មរហ័សទាន់ចិត្ត និងរួសរាយរាក់ទាក់

**(978) 452-5400**

Pailin Plaza
716 Middlesex St. Ste 1
Lowell, MA 01851

# CAMBODIA PHONE CARD

☑ មិនកាត់នាទី និងមិនផុតកំណត់
☑ សម្លេងឮច្បាស់ល្អខ្ទរស័ព្ទទៅស្រុកខ្មែរ

Veth Rotana

**4.5¢ per min**

| | Bonus (10%) | Min |
|---|---|---|
| $10.00 | $1 | 224 |
| $20.00 | $2 | 448 |
| $50.00 | $5 | 1,122 |
| $100.00 | $10 | 2,244 |

**Buy here and get 10% more!**

Tel: (978) 942 1641/ (978) 656 8141
(267) 253 3947

www.cambodiaphonecard.us

# មជ្ឈមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល

LOWELL ELDER CARE
978-596-1111

**345 Chelmsford St. Lowell, MA 01851/ 978-596-1111 – www.lowelleldercare.com**

## អ្វីទៅជាមណ្ឌលថែទាំមនុស្សចាស់ក្រុងឡូវែល?

គឺជាលំនៅដ៏កក់ក្តៅមួយ ដែលផ្តល់សេវាមានកម្មវិធីជាក់លាក់ដល់សហគមន៍បំណង់ គឺគាំទ្រឲ្យមនុស្សចាស់ជរាអាចរស់នៅដោយឯករាជ្យខ្លួនឯង និងជួយឲ្យមានសុខុមាលភាពផ្នែកផ្លូវកាយ ផ្លូវចិត្ត និងផ្នែកសង្គម ។ កម្មវិធីរបស់យើងធានានូវបរិស្ថានរស់នៅមួយប្រកបដោយសុវត្ថិភាព និងមានបរិយាកាសដូចជាផ្ទះរបស់ពួកគាត់ ។

## ទីតាំងនៃមណ្ឌល

ទីតាំងអាចរកឃើញដោយងាយក្នុងអគារថ្មី ជាមួយនូវការតុបតែងរចនាបែបសិល្បៈខ្មែរយ៉ាងល្អប្រណិត ។ មានបន្ទប់ទទួលទានអាហារស្អាត និងមានពន្លឺគ្រប់គ្រាន់ បន្ទប់អានសៀវភៅ បន្ទប់កុំព្យូទ័រ បន្ទប់សម្រាក បន្ទប់មើលភាពយន្ត និងកន្លែងផ្សេងៗទៀតជាទីពេញចិត្តរបស់លោកអ្នក ។

## មណ្ឌលផ្តល់សេវាដល់មនុស្សចាស់

- មានរថយន្តជូនដំណើរទៅវិញទៅមកពីផ្ទះលោកអ្នក
- ការពិនិត្យ និងថែទាំសុខភាព
- ការព្យាបាលតាមរយៈការហាត់ប្រាណ
- កិច្ចការសង្គម ( ផ្តល់ការពិគ្រោះផ្ទាល់ខ្លួន និងក្រុមគ្រួសារ )
- ម្ហូបខ្មែរក្តៅៗ និងចំណីផ្សេងៗ
- ការហាត់ប្រាណសំរាប់សុខភាពរាងកាយ
- កម្មវិធីសិល្បៈ និងតន្ត្រី
- ការអប់រំពីសុខភាព
- ការពិភាក្សាលើព្រឹត្តិការបច្ចុប្បន្ន (និងការសំណេះសំណាលគ្នា)
- សកម្មភាព និងដំណើរកំសាន្តក្រៅមណ្ឌល

## Our Services

- Door-to-Door Transportation
- Medical Care and Support
- Physical Therapy
- Social Worker
- Khmer Meals and Snacks
- Adaptive Physical Exercise
- Music Programs
- Health Educational Seminars
- Discussions on current events, (and times of reminiscing)
- Outdoor Field Trips

**សូមហៅទៅលោក វឌ្ឍ រស 978 996 6127**

# វិបត្តិវត្តអារាមខ្មែរ នៅឡូវែលនៅតែបន្ត

ស្ថានភាពហាក់ស្ងប់ស្ងាត់ បន្ទាប់ពីមានបាតុកម្មប្រឆាំងនិងសកម្មភាពវត្តសហគមន៍ព្រះសង្ឃខ្មែរនាឱកាសចូលឆ្នាំខ្មែរកន្លងទៅតែនេះគ្រាន់តែជារលកក្រៅតែប៉ុណ្ណោះ រីឯរលកក្នុងដែលលាក់កំបាំងនៅតែរំជើបរំជួលគួរឱ្យខ្លាចដដែល ។

សមាជិកម្នាក់ក្នុងចំណោមមនុស្សពីរនាក់ដែលមានរូបក្នុងខ្សែវីដេអូអនាមិកអាសអាភាសបានប្តឹងមនុស្ស៥នាក់ទៅតុលាការក្នុងនោះមានព្រះសង្ឃ១អង្គដែរ ចោទប្រកាន់ពីការចែកផ្សាយរឿងអាស្រូវរបស់ឯកជន រីឯអ្នកចុងចោទពុំមាននរណាម្នាក់ទទួលស្គាល់ថា បានប្រព្រឹត្តអំពើនោះទេ ។ មិនទាន់មានការចោទប្រកាន់នៅឡើយទេតែតុលាការក្រុងឡូវែលនិងជួបសវនាការអ្នកទាំងអស់ម្តងទៀត នៅថ្ងៃ១២ មិថុនា ខាងមុខ ។ គួរឱ្យចម្លែកដែរ ក្នុងរឿងនេះពុំមាននរណាម្នាក់ប្តឹងផ្តល់គ្នាពីការរូមរ័កនៅក្នុងទីវត្តអារាមរវាងព្រះសង្ឃនិងស្រ្តីជើងវត្តដែលជាប្រភពនៃការខឹងសម្បាររបស់សហគមន៍ពុទ្ធសាសនាខ្មែរនៅឡូវែលនៅឡើយទេ ។ ទំនងពីការខឹងសម្បារនេះលោក សំខាន់ ឃឿន ដែលជាសកម្មជនវត្តសហគមន៍ព្រះសង្ឃខ្មែរបានទទួលរងគ្រោះដោយនិយាយថា មានជនមិនស្គាល់មុខទៅចាក់កង់ឡានទាំង៤របស់លោកមិនឱ្យលោកចេញទៅធ្វើការ និងមិនអាចជូនកូនទៅសាលារៀនបាន និងបាញ់ថ្នាំពណ៌ក្រវែមក្រវាមពេញមុខផ្ទះលោកទៀតផង -រីឯកាសែតខ្មែរផុស ក៏បានត្រូវគេរាយការណ៍មកថា មានគេប្រមូលចោលធុងសម្រាម ពីព្រោះបាននិយាយកាន់ជើងក្រុមបាតុករប្រឆាំងនឹងវត្ត ។ ដោយសារមានរឿងអាស្រូវនៅទីវត្តអារាមនេះក្រុមបាតុករបានបង្កើតគណកម្មាធិការវប្បធម៌ខ្មែរមួយ ដើម្បីការពារពុទ្ធបរិស័ទ ហើយប្រមូលធនធានរកមេធាវីជួយដល់អ្នកចុងចោទដោយលក់អាហារយឺតធ្វើពិធីជប់លៀងជាដើម ។

រហូតមកដល់ពេលនេះ ទាំងសាម៉ីខ្លួនជាដើមចោទ និងទាំងចុងចោទ ហាក់ដូចជាពុំមាននរណាម្នាក់ចង់វែករកថា"តើខ្សែវីដេអូមានភាពពិតយ៉ាងណា?" នោះទេ ពីព្រោះអ្នកទាំងអស់ហាក់ដូចជាបានដឹងថា នរណាជាអ្នកដាក់ម៉ាស៊ីនលួចថត? មានមនុស្សប៉ុន្មាននាក់ដែលរស់នៅក្នុងវត្ត និងចេះប្រើម៉ាស៊ីននោះ? ការពិតនោះកំពុងស្ថិតនៅបង្កើយដៃរង់ចាំតែធ្លាយមកក្រៅតែប៉ុណ្ណោះ ។

រឿងដ៏អាស្រូវដែលបានផ្ទុះខ្លាំងរហ័សផ្អើលស.រ.អា និងផ្អើលដល់កម្ពុជាបានប្រទាញឱ្យសហគមន៍ខ្មែរឡូវែលមានភាពអាម៉ាសចង់ស្វែងរកដំណោះស្រាយជូនវត្តត្រៃរតនារាមដែលផ្ទុះពីយូរអូសវែងអន្លាយមកហើយ រវាងវត្តលើវត្តក្រោមអោយរក **តទៅទំព័រទី ១៧**

## As Elections Loom,....

CONTINUED FROM PAGE 9

There's not enough support in society or state that says women can make a difference," she said.

On Thursday, Ms. Sochua co chaired a CNRP meeting at which the party's policy on women was discussed-taking care of women's physical, mental and reproductive health is a priority, officials said.

At the talk, CNRP Kompong Speu province reserve candidate Kim Natsin said money can be a major obstacle for women who want to run in elections, because theyhave to fund their own campaigns.

"I think I am active and popular enough, but I do not have so much money to contribute to the campaign," she said.

Ros Sopheap, deputy chair of the Committee to Promote Women in Politics (CPWP), said the failure to register more women was a "disappointment" and a missed opportunity to rebalance gender perspectives and put more focus on health and education at a decision-making level.

'Through our dialogue and forums, we found that even the young women who are highly educated got advice from their families not to play politics, because ifs still a dangerous issue for society at the moment," Ms. Sopheap added.

CPP lawmaker Ho Naun said she thought the · CPP had been "successful" in getting more women involved politically, but added that "women should strengthen their capacity so that they can participate--sometimes, women themselves are not confident enough."

## Factory ...

CONTINUED FROM PAGE 6

technical adviser Jill Tucker said on Thursday, explaining that participation in the Better Factories program is entirely voluntary.

Maeve Galvin, a consultant for Better Factories Cambodia, said on Friday that an investigation is needed. 'What we need is an investigation to get information and find out who is responsible and why it reaIly happened," she said.

"Obviously the people involved are the factory ownership and the management, the Royal Government of Cambodia-who have a labor inspections department and the international buyers sourcing from the factory. Those

are the four groups who have the responsibility to take action."

## តមកពីទំព័រទី ៩ អ្នកក្រ និងអ្នកមានស្រុកខ្មែរ....

យល់ស្របរវាងខ្មែរនិងខ្មែរ ធ្វើឱ្យខ្មែរយ៉ាងតិចពីរលាននាក់ស្លាប់តាំងពីឆ្នាំ១៩៧០មកទល់នឹងពេលឥឡូវនេះ ហើយមិនតែប៉ុណ្ណោះធ្វើឱ្យខ្មែរបាត់ទឹកបាត់ដីមួយចំនួនតាមព្រំដែន និងតាមសមុទ្រ។

ដូច្នេះរឿងធ្វើឱ្យមានការយល់ស្របគ្នានេះជារឿងពិបាក។ តែយើងយល់ហើយថា ពិតមែនតែពិបាកមែនតែមិនមែនគ្មានផ្លូវធ្វើទៅបានទេ។ យើងអាចសួរខ្លួនយើងថាតើលោកមហាត្មាគ្ហាឌី (Mahatma Gandhi)ធ្វើយ៉ាងដូចម្ដេចបានជាមានមនុស្សរាប់លាននាក់ជឿជើរតាមគាត់ក្នុងការប្រឆាំងនឹងអង្លេស។

ដូច្នេះដើម្បីឱ្យខ្មែរនិងប្រទេសខ្មែរលូតលាស់ចម្រុងចម្រើនសម្បូរសប្បាយបានរដ្ឋាភិបាលត្រូវពុះពារគ្រប់ឧបសគ្គទាំងអស់ដើម្បីទទួលបាននូវការដឹកនាំពេញទៅដោយប្រសិទ្ធិភាពដើម្បីដឹកនាំប្រជាពលរដ្ឋ ជាពិសេសអ្នកមាននិងអ្នកក្រឱ្យយល់ស្របគ្នា។

លើកក្រោយនឹងរើកញែកអំពីការទាក់ទងរវាងអ្នកមាន និងអ្នកក្រ៕

# ខួបបីឆ្នាំនៃក្លឹបសារព័ត៌មានខ្មែរប៉ុស្តិ៍ក្នុងក្រុងឡូវែល

**អត្ថបទដោយ សុខា**

**ក្រុងឡូវែល:** កាសែតខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិកបានរៀបចំខួបគម្រប់ ៣ឆ្នាំ នៃក្លឹបសាពតិមានខ្មែរប៉ុស្តិ៍ កាលពីថ្ងៃទី២៩ខែមិនាកន្លងទៅនេះ នៅភោជនីយដ្ឋានប៉ៃលិនក្រោមការចូលរួមពីភ្ញៀវកិត្តិយសជាតិ និងអន្តរជាតិសំខាន់ៗដែលរស់នៅក្នុងតំបន់ ព្រមទាំងតំបន់ដទៃទៀតដែលខ្មែររស់នៅក្នុងរដ្ឋសហព័ន្ធមួយនេះ។


Mr. Veasna noun



Mr. Hong Neth

ស្វាគមន៍កម្មវិធីដោយលោក សំខុន ពិន ចាងហ្វាងកាសែតខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិក ព្រមទាំងសេចក្តីថ្លែងបើកកម្មវិធីនារាត្រីលាងសាយភោជន៍ លោកបញ្ជាក់ថា នេះជាខួបលើកទីបីនៃការប្រារព្ធនូវពិធីក្លឹបសាព័តិមានខ្មែរប៉ុស្តិ៍ស.រ.អា តែជាលើកទីមួយដែលក្លឹបសាព័តិមានខ្មែរប៉ុស្តិ៍ធ្វើឡើងនូវក្រុងឡូវែល ។ លោកបញ្ជាក់ថា កាសែតខ្មែរប៉ុស្តិ៍ជាមធ្យោបាយនាំឱ្យមានការរីកចម្រើននៅក្នុងសហគមន៍ខ្មែរ ហើយវេទិកានៅរាត្រីនេះ ជាវេទិកាសាធារណៈផ្តល់ជូនដល់សាធារណជន ។ សារៈសំខាន់នៃកម្មវិធីនេះ គឺការប្រមូលផ្តុំនូវបុគ្គល និងស្ថាប័នសំខាន់ៗទ្រទ្រង់សហគមន៍ខ្មែរក្នុងនោះរួមមាន អ្នកជំនួញ អ្នកនយោបាយ សង្គម គ្រូពេទ្យ និងអ្នកច្បាប់ ឱ្យបានចូលរួមក្នុងកម្មវិធីនេះ សំដៅប្រាស្រ័យទាក់ទងគ្នាបញ្ចេញនូវទស្សនៈមតិយោបល់ បង្កើតជាយន្តការនាំឱ្យសង្គមខ្មែរក្នុងសហរដ្ឋអាមេរិកមានការរីកចម្រើន។ ជាមួយគ្នានោះលោកបានបង្ហាញថា ការផ្សាយរបស់កាសែតខ្មែរប៉ុស្តិ៍ គឺមួយខែពីរដង ហើយក្នុងមួយដងបោះចាប់ពី៧000ទៅ៨000ច្បាប់។ ដូច្នេះមានខ្មែរយ៉ាងហោចណាស់មួយម៉ឺននាក់ដែលបានអានកាសែត ព្រោះកាសែតនេះត្រូវបានអានពីដៃមួយទៅដៃមួយទៀត។ សំខាន់ជាងនេះ លោកជឿជាក់ថាកាសែតនឹងនាំដំណឹងទៅដល់ផ្ទះរបស់លោកអ្នក។



Ms. Rida Merger


Ms. Soben Pin

Mr. Ratha Yem

ដឹកនាំកម្មវិធីដោយពិធីករពីររូបសំខាន់ៗ គឺអ្នកស្រី សុបិន្ត ពិន ជាភរិយារបស់លោកសំខុន ពិន ព្រមទាំងជានាយកផ្នែកទីផ្សារ និងលោករដ្ឋា យ៉ែម ជានាយកប្រតិបត្តិនៃក្រុមហ៊ុនដ៏សំខាន់មួយក្នុងក្រុងឡូវែល។ អ្នកស្រី សុបិន្ត ពិន បានលើកយកចំនុចសំខាន់មួយ ដែលបង្ហាញពីមូលហេតុនៃវត្តមានរបស់ខ្មែរប៉ុស្តិ៍ស.រ.អា ដែលប្តូរទីស្នាក់ការរបស់ខ្លួនមកកាន់តំបន់ឡូវែលដោយអ្នកស្រីលើកយកពីប្រវត្តិនៃការសន្ទនារបស់អ្នកស្រីជាមួយទីប្រឹក្សាក្រុងឡូវែលសញ្ជាតិអាមេរិក រីណា មីស្សឺរ ក្រោមចំណោទសួរមួយថា តើត្រូវធ្វើដូចម្តេចទើបយើងអាចឃាត់អ្នកឱ្យនៅឡូវែលបាន?

**អ្នកស្រី រីណា មីស្សឺរ:** ជាទីប្រឹក្សាក្រុងឡូវែលបានសម្តែងចំណាប់អារម្មណ៍ដោយសង្ខេបថា សេវាផ្តល់ពតិមានដំណឹងរបស់សារព័ត៌មានខ្មែរប៉ុស្តិ៍ជាសេវាមួយដ៏មានតម្លៃ ហើយជាមធ្យោបាយកាត់បន្ថយនូវគម្លាតរបស់ប្រជាជន ពីព្រោះតាមរយៈកាសែតខ្មែរប៉ុស្តិ៍ស.រ.អាប្រជាជនខ្មែរដែលរស់នៅទីនេះ ហើយដែលមិនចេះអាន ឬនិយាយភាសាអង់គ្លេសអាចទទួល និងស្វែងយល់ព័ត៌មានបានតាមកាសែតខ្មែរប៉ុស្តិ៍ស.រ.អា ។ លោកស្រី រីណា មីស្សឺបានលើកទឹកចិត្តឱ្យកាសែតខ្មែរប៉ុស្តិ៍ស.រ.អា បន្តនូវកិច្ចការដ៏ល្អរបស់ខ្លួនបន្តទៀត។

**លោក វាសនា នួន:** ជាទីប្រឹក្សាក្រុវឡូវែលសញ្ជាតិខ្មែរទី២ដែលបានជាប់ឈ្មោះបំពេញតួនាទីជាទីប្រឹក្សាក្រុង ហើយលោកបានមានប្រសាសន៍ថា លោកសូមថ្លែងអំណរគុណចំពោះការគាំទ្រសម្រាប់រូបលោក ហើយលោកមានកិត្តិយសដែលបានចូលរួមនៅក្នុងកម្មវិធីនេះ ។ លោកថ្លែងថា កម្មវិធីលើកនេះសំខាន់ ព្រោះជាពេលដែលកាសែតខ្មែរប៉ុស្តិ៍ស.រ.អា ផ្លាស់ទីស្នាក់ការរបស់ខ្លួនមកក្រុងឡូវែល ហើយធ្វើខួបសាពតិមាននៅឡូវែលថែមទៀត។ ឆ្លៀតឱកាសនោះលោកក៏បានលើកឡើងនូវឈ្មោះបុគ្គលសំខាន់ៗដែលរួមចំណែកក្នុងសង្គមខ្មែររួមមាន អតីតទីប្រឹក្សាក្រុង ឬទ្ធី អ៊ុង លោកវ៉ាន់ ពេជ្រ លោកវង់ រ៉ូស លោក សំខាន់ ឃឿន អតីតប្រធានសមាគមខ្មែរ លោក វ៉ាស៊ុ អាន ប្រធានសមាគមខ្មែរបច្ចុប្បន្ន នាយកស៊ុនិត ពៅ នៅមន្ទីរពេទ្យមេត្តា កុងស៊ុលកិត្តិយសអ៊ូ សុវណ្ណលោកបណ្ឌិត សេងលី គួង នាយកសមាគមពន្លឺកូនខ្មែរ សួន សាយ័ន្ត ។ល។

លោក ហុង ណែត ទីប្រឹក្សាក្រុងលីន: អញ្ជើញចូលរួមកម្មវិធីរាត្រីក្លឹបសាព័តិមានខ្មែរប៉ុស្តិ៍ជាលើកទីពីរ លោក ហុង ណែត ថ្លែងអំណរគុណដល់កាសែតខ្មែរប៉ុស្តិ៍ស.រ.អា ព្រោះដោយសារតែកាសែតខ្មែរប៉ុស្តិ៍ស.រ.អា ទើបលោកមានឱកាសផ្សព្វផ្សាយបង្ហាញពីទស្សនៈ និងមតិរបស់លោកក្នុងនាមជាបេក្ខជនទីប្រឹក្សាក្រុង និងមានឱកាសជាប់ឆ្នោតជាទីប្រឹក្សាក្រុងលីននាពេលបច្ចុប្បន្ន។ ស្របគ្នានោះ លោកមានប្រសាសន៍ថា រាត្រីសារព័តិមានខ្មែរប៉ុស្តិ៍ស.រ.អា បង្ហាញពីសាមគ្គីភាពដែលខ្មែរមានខណ។ លោកក៏បង្ហើបផងដែរថា លីនជាក្រុងដែលមានខ្មែររស់នៅច្រើនគួរសម និងលើកទឹកចិត្តខ្មែរៗនៅឡូវែលឱ្យបានទៅលេងក្រុងលីនតាមការគួរ ៕

**បន្តទៅលេខក្រោយ**

# គណបក្សសញ្ជាតិកម្ពុជាឈរលេខរៀងទី១ក្នុងសន្លឹកឆ្នោត

**លាង ផាន់ណារ៉ា**

**ភ្នំពេញប៉ុស្តិ៍**

**ភ្នំពេញ:** ក្នុងការចាប់ឆ្នោតកំណត់លំដាប់លេខរៀងគណបក្សនយោបាយសម្រាប់បោះឆ្នោតជ្រើសរើសតំណាងរាស្ត្រនីតិកាលទី៥ ឆ្នាំ ២០១៣ នៅព្រឹកថ្ងៃទី២៣ ខែឧសភានេះ គឺគណបក្សសញ្ជាតិកម្ពុជាឈរនៅលេខរៀងទី១ នៅក្នុងសន្លឹកឆ្នោត ។ លេខទី២ គឺគណបក្សហ៊្វុនស៊ិនប៉ិច,លេខរៀងទី៣ គណបក្សសាធារណរដ្ឋប្រជាធិបតេយ្យ លេខរៀងទី៤ គណបក្សប្រជាជនកម្ពុជា លេខ៥គណបក្សខ្មែរអភិវឌ្ឍន៍សេដ្ឋកិច្ច, លេខ៦គណបក្សខ្មែរឈប់ក្រ,លេខ៧ គណបក្សសង្គ្រោះជាតិ , លេខ៨គណបក្សសម្ព័ន្ធដើម្បីប្រជាធិបតេយ្យ ។

សម្តេចព្រះអគ្គមហាសង្ឃរាជាធិបតី ទេពវង្ស សម្តេចព្រះសង្ឃនៃគណៈមហានិកាយនៃព្រះរាជាណាចក្រកម្ពុជា និងសម្តេចព្រះអភិសិរីសុគន្ធា មហាសង្ឃារាជាធិបតី ប៊ូ គ្រី សម្តេចព្រះមហាសង្ឃរាជានៃគណៈធម្មយុត្តិកនិកាយនៃព្រះរាជាណាចក្រកម្ពុជាបាននិមន្តជាព្រះរាជធិបតីភាពក្នុងពិធីចាប់ឆ្នោតកំណត់លំដាប់លេខរៀងគណបក្សនយោបាយនេះ ។

លោក អ៊ឹម សួស្តី ប្រធានគណៈកម្មាធិការជាតិរៀងចំការបោះឆ្នោតបាននិយាយក្នុងពិធីកំណត់លេខរៀងគណបក្សនយោបាយនេះថា "ការកំណត់លេខរៀង គណបក្សនយោបាយនិមួយៗលើសន្លឹកឆ្នោត និងជួយបង្កលក្ខណៈងាយស្រួលដល់គណបក្សនយោបាយក្នុងការឃោសនាបោះឆ្នោត ការបោះឆ្នោត នឹងជួយឱ្យអ្នកបោះឆ្នោតអាចស្គាល់បានដោយងាយស្រួលនូវគណបក្សនយោបាយដែលពួកគាត់ស្រលាញ់ និងពេញចិត្ត" ៕

## តមកពីទំព័រទី ១ កម្ពុជាភ្លក់រសជាតិ...

ប្រទេសប្រជាធិបតេយ្យ ។ រឿងរាល់លើកថ្នាក់ដឹកនាំនយោបាយខ្មែរបានបំផ្លាញយន្តការណ៍ដ៏ប្រណិតសម្រាប់លើកដំកើងប្រជាជាតិយ៉ាងខ្ទេចខ្ទាំដោយ"ការចង់ ចំណេញច្រើនជាងចង់ត្រូវ"ដោយ "ការចង់បានសម្បត្តច្រើនជាងចង់បានឧត្តមគតិ" ឬដោយ"ការខ្លាចច្រើនជាងក្លាហាន" ។ តែក្នុងការបោះឆ្នោតឆ្នាំ២០១៣នេះ យ៉ាងហោចណាស់មានយន្តការមួយក្នុងចំណោមយន្តការដ៏ច្រើនបានត្រូវផ្លាស់ប្តូរដោយគណបក្សប្រឆាំងបានដាក់ជូនឱ្យប្រជាពលរដ្ឋខ្មែរអាចជ្រើសរើសគណបក្សដែលមានគោលដៅដូចគ្នាមានឧត្តមគតិដូចគ្នាមានប្រវត្តិតស៊ូនិងជួបគ្រោះថ្នាក់ដូចគ្នា... តែអ្នកទាំងពីរបានបង្ហាញពីការចរចារបញ្ចូលគ្នាយ៉ាងបើកចំហរ និងយ៉ាងគ្មានសំចៃអំពីគុណភាពនៃឧត្តមគតិជាតិតែសំចៃយ៉ាងតឹងតែងអំពីបរិមាណនៃអ្នកចូលរួមក្នុងសម្ព័ន្ធដែលក្រុមនោះមានឧទ្ទិសនាមថា "គណបក្សសង្គ្រោះជាតិ" ហើយនេះក៏ជាព្រឹត្តិកាណ៍ដែលលុបបំបាត់នូវឧទ្ទិសនាមចាស់ដែលថា "ខ្មែរចូលចិត្តតែឈ្លោះបែកបាក់គ្នា"ជាលើកដំបូងបង្អស់ដែរ ។

ចាប់តាំងពីរខ្មែរបានទទួលឯករាជ្យនាឆ្នាំ១៩៥៤មកក៏មានការចងសម្ព័ន្ធច្រើនដងមកហើយដែរ ដូចជាចលនាសង្គមរាស្រ្តនិយមរបស់សម្តេចនរោត្តម សីហនុ ដែលសម្ព័ន្ធភាពមានគោលដៅមិនដូចគ្នា គឺដឹកនាំដោយបញ្ចូលគ្នាទៅក្នុងអំណាច ដើម្បីបំបាត់អ្នកប្រឆាំង -ចលនាបក្សសម្ព័ន្ធកុម្មុយនីស្តខ្មែរចិននិងខ្មែរយួនដែលគោលដៅគឺ "យកឈ្នះតែម្នាក់ឯង" -សម្ព័ន្ធភាពនៃ "រដ្ឋាភិបាលក្បាលពីរ" គឺការ"ចង់បានចំណេញច្រើនជាងចង់បានយុត្តិធម៌" របស់សម្តេចនរោត្តម សីហនុ ឬក៏ការ "បំរើផលប្រយោជន៍បរទេស" នៃអ្នកនយោបាយខ្មែរ រីឯលទ្ធផលនៃការប្រជែងគ្នាដែលធ្លាប់ប្រទះ គឺប្រកបដោយល្បិចប្រកបដោយការភូតភរប្រកបដោយការគម្រាមកំហែងពុំបានជាប្រយោជន៍ដល់ប្រជាពលរដ្ឋផ្ទុយទៅវិញសម្លេងឆ្នោតពុំបានឆ្លុះបញ្ចាំងឆន្ទៈពលរដ្ឋក្នុងលទ្ធិប្រជាធិបតេយ្យទេ ។ លើកនេះគណបក្សសង្គ្រោះជាតិបានផ្តើមយុទ្ធនាការតាមភាពបរិសុទ្ធមួយដែលស្ទើររកជឿមិនបាន ពីព្រោះមិនមាននរណាដែលសាកល្បងធ្វើពីមុនមកតែការពិតប្រទេសប្រជាធិបតេយ្យធំៗ គេធ្វើបានជោគជ័យរួចទៅហើយ ។

លោក សម រង្ស៊ី មេដឹកនាំគណបក្ស សម រង្ស៊ី នឹងលោក កឹម សុខា ដឹកនាំគណបក្សសិទ្ធិមនុស្ស តាំងពីផ្តើមធ្វើនយោបាយមកតែងថែររក្សាកេរ្តិ៍ឈ្មោះថ្លៃថ្នូ និងសីលធម៌ស្អាតស្អំមិនដែលឱ្យនរណាមើលងាយ ហើយកាត់តម្លៃជាប្រាក់បានឡើយដែលនេះជាលក្ខខណ្ឌដំបូងនៃជោគជ័យរបស់សម្ព័ន្ធភាពនិមួយៗ ។ លក្ខខណ្ឌបន្ទាប់គឺការគ្រប់គ្រងដែលមានបំណងប្រាថ្នាយ៉ាងរឹងមាំយូរអង្វែង និងក្លាហានការពារជនរងគ្រោះការពារសុច្ចរិត-យុត្តិធម៌ ការពារផលប្រយោជន៍ប្រជាជាតិដែលនឹងបង្កើតជំនឿថា "ទោះជាជាប់ឆ្នោតមានអំណាច ឬគ្មានក៏គ្មានអ្វីប្តូរផ្លាស់ ពីព្រោះជាបុគ្គលិកលក្ខណៈប្រចាំជីវិត"អ្នកដឹកនាំនៃគណបក្សប្រឆាំងទាំងពីរបានបំពេញតួនាទីនេះ ស្ទើរដៃគ្នាជាចំហរមិនខ្លាចភាពគ្រោះថ្នាក់ដល់ជីវិតពីគូរបដិបក្សនយោបាយតាំង **តទៅទំព័រទី ២២**

## តមកពីទំព័រទី ៣ បទសម្ភាសន៍ជាមួយលោក សម រង្ស៊ី ស្តីពី...

យ៉ាងតិចក៏បាន៣៧អាសនៈដែរ ចុះឥឡូវជាមួយគណបក្សសង្គ្រោះជាតិដែលខ្ញុំឃើញថា ហាក់ដូចជាមានថាមពលថ្មីលោកសង្ឃឹមបានប៉ុន្មានអាសនៈដែរ ?

**សម រង្ស៊ី :** ចម្លើយគឺអាស្រ័យលើគុណភាពនៃការបោះឆ្នោតការបោះឆ្នោតកាន់តែសុក្រិត្យ គឺយើងបានកៅអីកាន់តែច្រើនតែដោយសារលោក ហ៊ុន សែន គាត់ស្លន់ស្លោដោយសារគណបក្សសង្គ្រោះជាតិ



សម រង្ស៊ី ចូលរួមចូលឆ្នាំខ្មែរនៅឡូវែល

មានសន្ទុះលឿនគាត់នឹងរកមធ្យោបាយលួចសន្លឹកឆ្នោតកាន់តែច្រើនទៀត ដើម្បីកុំឱ្យយើងទៅកាន់អំណាចបានគេប្រើល្បិចយុទ្ធវិធីកាន់តែច្រើន ឯយើងក៏ត្រូវមានយុទ្ធវិធីរបស់យើងដែរ ។ នៅថ្ងៃ២៤ មេសានេះ គណបក្សសង្គ្រោះជាតិយើងនឹងមានបាតុកម្មធំៗ ដើម្បីទាមទារឱ្យមានការបោះឆ្នោតត្រឹមត្រូវ "ការបោះឆ្នោតកាន់តែសុក្រិត្យសម្លេងសង្គ្រោះជាតិកាន់តែកើន"

**ពិន សំខុន :** មុននេះបន្តិចរូបលោកក្តីលោក កឹម សុខា ក្តីនិយាយថា "អាចនឹងមានពហិការមិនចូលរួមការបោះឆ្នោតខាងមុខ" តើពេលនេះ គណបក្សសង្គ្រោះជាតិនៅតែរក្សាជំហរដដែលនេះតទៅទៀតទេ ?

**សម រង្ស៊ី :** យើងដឹងថា មានការលួចសន្លឹកឆ្នោតតែយើងមិនត្រូវបោះបង់សន្លឹកឆ្នោតដែលគេមានបំណងបោះឱ្យគណបក្សសង្គ្រោះជាតិទេ ដូចជាទ្រព្យសម្បត្តិយើងបើទោះបីចោរលួចខ្លះ មែនតែយើងត្រូវខំការពារសម្បត្តិដែលនៅសល់ ដើម្បីជាមូលដ្ឋានទាមទារសម្បត្តិដែលចោរលួចបានទៅនោះ ដូចជាយើងមានគោ១០ក្បាលបោះគេលួចអស់៥ក្បាលហើយ យើងមិនអាចឱ្យទៅចោរទាំង៥ក្បាលដែលនៅសល់នោះទេ យើងត្រូវរកមធ្យោបាយរកគោដែលចោរលួចនោះមកវិញ យ៉ាងណាមិញអំណាចរដ្ឋដែលបានដៅលួចសន្លឹកឆ្នោតក៏ត្រូវតែរកមធ្យោបាយយកមកវិញឱ្យខាងតែបាន ។

**ពិន សំខុន :** ដោយយោងទៅតាមភាពក្លាហានរបស់លោកមិនខ្លាចការគម្រាមឬគ្រប់កាំភ្លើងអ្វីសោះនោះ តើអាចនិងមានព្រឹត្តិការណ៍លោក សម រង្ស៊ី ទៅកម្ពុជាដោយចៃដន្យណាមួយទេ ?

**សម រង្ស៊ី :** អាចនិងមានគ្រប់បែបយ៉ាងទាំងអស់! បើរដ្ឋាភិបាលណាចេញមកពីការបោះឆ្នោតមិនត្រឹមត្រូវទាំងខ្មែរ និងសហគមន៍អន្តរជាតិមិនត្រូវទទួលស្គាល់រដ្ឋាភិបាលបែបហ្នឹងទេ ត្រូវតែប្រឆាំង ហើយត្រូវប្រើគ្រប់មធ្យោបាយផ្តួលរំលំរដ្ឋាភិបាលបែបហ្នឹងឱ្យបាន ។

**ពិន សំខុន :** លោកនៅខាងក្រៅសមាជិកលោកនៅខាងក្នុង តើលោកមានភាពកក់ក្តៅប៉ុណ្ណា ចំពោះសម្ពន្ធភាព និងសហការីនៅខាងក្នុង ?

**សម រង្ស៊ី :** ខ្ញុំមានការកក់ក្តៅ និងប្រជារាស្ត្រដែលនាំគ្នាក្រោកឈរទទួលគណបក្សសង្គ្រោះជាតិកាន់តែច្រើន ដើម្បីឱ្យគណបក្សយើងសង្គ្រោះជាតិឱ្យទាល់តែបាន ។

**ពិន សំខុន :** សូមអរគុណលោក សម រង្ស៊ី សូមឱ្យលោកបានប្រកបដំណើការណ៍ថ្មីបានល្អ និងទទួលបាននូវជោគជ័យថ្មីទៀតនាឱកាសចូលឆ្នាំថ្មីនេះ ៕ ចប់

## តមកពីទំព័រទី ៨ វិបត្តិវត្តអារាមខ្មែរ...

ទីបញ្ចប់ជាមួយគ្នាផងដែរ ។ ប្រជាពលរដ្ឋរួមទាំងតុលាការក្រុងឡូវែលបានស្នើឱ្យបញ្ចូលវត្តនៅតែមួយ ដូចដែលលក្ខន្តិកៈបានចែងតែ២ឆ្នាំ



កន្លងមក ហើយគណកម្មាការរួមទាំងព្រះសង្ឃ និងអាចារ្យវត្តពុំមានសមត្ថភាពធ្វើឱ្យ"វត្តពាក់កណ្តាលពីរដង... នេះចូលគ្នាបានទេទើបតែពេលនេះ ហាក់ដូចជាមានចរន្តចង់រកដំណោះស្រាយបញ្ចូលវត្តតាមឆន្ទៈពលរដ្ឋឡើងវិញ ក៏ប៉ុន្តែដូចអូសបូស្សីបញ្ច្រាស់ចុងគេនៅឃើញការប្រទាញប្រទង់គ្មានការលះបង់ ដើម្បីព្រះធម៌បាននៅឡើយ ។ គំរូអាក្រក់ប្រឡាក់បេះដូងខ្មែរនៅពេលឃើញពាក់កណ្តាលវត្តទាំងពីរនេះម្តងៗភ្លើងកំហឹងឈ្លោះគ្នាតែងឆេះឆ្ពោលឡើងថ្មីៗនេះវត្តពាក់កណ្តាលខាងលើត្រៀមធ្វើបុណ្យវត្តពាក់កណ្តាលខាងក្រោមកាត់ភ្លើងច្បាស់ជាមានបំណងល្អ និងបុព្វហេតុត្រឹមត្រូវក្នុងរឿងនេះតែពុំមានទេបំណងដែលថា ចង់រួបរួមគ្នា គឺគ្រាន់តែជាសម្លេងគ្មានខ្លឹមសារ និងគ្មានឆន្ទៈរបស់មនុស្សដែលមានអំណាចនៅក្នុងវត្តតែប៉ុណ្ណោះទេ ។ ដ៏រាបណាវត្តមួយនេះនៅតែជាវត្តពាក់កណ្តាលពីរដងស្ថានភាពបែកបាក់ប្រឈមមុខដាក់គ្នា និងស្ថិតនៅទីនោះ ហើយប្រសិនបើព្រះធម៌មានចែងពីករណីនេះអ្នកទៅធ្វើបុណ្យបែរជាចុះទៅឋាននរកជាមិនខាន ។

អ្នកក្រុងឡូវែល បើទោះជាមានភាពអាម៉ាសដោយសារសកម្មភាពមិនប្រក្រតីនៅទីវត្ត ក៏មិនមែនតែម្នាក់អែងដែរ នៅមានព្រឹត្តិការណ៍កើតនៅវត្តច្រើនទៀតនាស.រ.អានេះ ដែលបើតាមមើលទៅព្រះសង្ឃពុំអាចគ្រប់គ្រងតែអែងដោយគ្មានការចូលរួមពីបាសកបានទេ ៕ **ពិន សំខុន**

តមកពីទំព័រទី ៦

## អ្នកគ្រប់គ្រងរោងចក្រថា ការស្លាប់...

ក្រុមហ៊ុននោះទេ ។ លោកបានមានប្រសាសន៍ថា "រោងចក្ររបស់ខ្ញុំបានជួលអ្នកម៉ៅការបន្តឱ្យសាងសង់យើងគ្រាន់តែប្រើប្រាស់សំណង់នោះ ដើម្បីការងារប៉ុណ្ណោះ" ។

លោក វ៉ាន់ ស៊ូអៀង ប្រធានសហគមរោងចក្រកាត់ដេរនៅកម្ពុជា បានមានប្រសាសន៍ថា "រោងចក្រនោះមិនចាំបាច់មានការអនុម័តសម្រាប់ការងារសាងសង់ទាំងអស់ ដែលពួកគេត្រូវធ្វើនោះទេ ។ និយាយខ្ញុំចំរោងចក្រមិនចាំបាច់សុំការអនុញ្ញាតសម្រាប់សំណង់តូចតាចនោះទេ" ។

លោក វ៉ាន់ ស៊ូអៀង មានប្រសាសន៍ថា ទោះយ៉ាងណាចាប់ពីពេលនោះតទៅរោងចក្រគួរតែពិនិត្យសុវត្ថិភាពអគាររបស់ខ្លួន ។

លោក ម៉ម ណារី ប្រធានមន្ទីររៀបចំដែនដីនគរូបនីយកម្ម និងសំណង់ខេត្តកំពង់ស្ពឺបានមានប្រសាសន៍ថា នៅរោងចក្រនោះ កាលពីថ្ងៃព្រហស្បត្តិ៍ថា ប្លង់សេដែលបានបាក់នោះ គឺជាផ្នែកដែលក្រុមហ៊ុនបានសាងសង់ពង្រីកតភ្ជាប់អគាររោងចក្រពីរ ដោយគ្មានការអនុញ្ញាតិ ។"ពួកគេសង់វាខុសបច្ចេកទេស ហើយដាក់អីវ៉ាន់នៅលើនោះធ្ងន់ទៀត" ។

លោក មឿង តុលា ប្រធានកម្មវិធីការងាររបស់មជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ ថ្លែងកាលពីថ្ងៃសុក្រថា ការនិយាយសម្រាលឧប្បត្តិហេតុនោះ គឺជាការមាក់ងាយដល់ជនរងគ្រោះ និងគ្រួសាររបស់ពួកគេ ។

លោកមានប្រសាសន៍ថា "មនុស្សដល់ទៅពីរនាក់បានស្លាប់ កោតតែអ្នកនិយាយថា វាជាឧប្បត្តិហេតុតូចតាចទៅកើត!" ។

លោកតុលាមានប្រសាសន៍ថា អាជ្ញាធរនឹងម្ចាស់រោងចក្រត្រូវតែទទួលខុសត្រូវ ពោលគឺពួកគេត្រូវតែដំឡើងរោងចក្រឱ្យបានប្រសើរ និងការត្រួតពិនិត្យឱ្យហ្មត់ចត់ ។



លោកបន្តថា "សូម្បីតែអាជ្ញាធរក៏បានត្អូញត្អែរអំពីម្ចាស់រោងចក្រដែរ ហើយការសាងសង់ក៏គ្មានការអនុញ្ញាតទៀត ពេលនេះពួកគេគ្រាន់តែយកលេសប៉ុណ្ណោះ" ។

លោក សូ បញ្ញា អគ្គនាយកកងវិស្វកម្មជំនាញកម្ពុជា បានបដិសេធមិនធ្វើអត្ថាធិប្បាយពាក់ព័ន្ធនឹងបទដ្ឋានសំណង់នៅរោងចក្រវីស្តាស៊ូនេះទេ ប៉ុន្តែបានមានប្រសាសន៍ថា រដ្ឋាភិបាលបានប្រគល់ភារកិច្ចឱ្យលោកត្រួតពិនិត្យ និងធ្វើរបាយការណ៍អំពីកន្លែងនេះ ។

លោកមានប្រសាសន៍ថា "ខ្ញុំនឹងចុះទៅទីនោះនៅថ្ងៃច័ន្ទជាមួយវិស្វករពីរបីនាក់ផ្សេងទៀត ហើយខ្ញុំមិនអាចវាយតម្លៃបានទេ ប្រសិនបើមិនបានចុះទៅដល់ទីនោះ" ។

ការវាយតម្លៃតាមរូបប្លង់សេដែលបានបាក់នោះ លោក ម៉ៃឃើល ស "Michael Shaw" មកពីអង្គការវិស្វកម្មគ្មានព្រំដែនបានសន្និដ្ឋានថា សំណង់នោះមិនមែនសង់សម្រាប់ប្រើប្រាស់សំរាប់រយៈពេលយូរទេ ព្រោះឆ្អឹងដែកទាំងនោះគ្រាន់តែផ្សារភ្ជាប់គ្នាប៉ុណ្ណោះ ។

លោក ម៉ៃឃើល ស បានលើកឡើងនៅក្នុងអ៊ីមែលថា "បើដំឡើងខុសបច្ចេកទេសមុខតំណភ្ជាប់ដោយទឹកអន្សាមិនមែនជាសំណង់ល្អនោះទេ ហើយធ្នឹមគួរតែចាប់បាឡុងផងផ្សារផង និងទុកឱ្យនៅសល់ចុងសម្រាប់ដាក់គងពីលើគ្រឹះទៀត" ។

លោក ម៉ៃឃើល ស បានសន្និដ្ឋានថា "សំណង់នេះ មិនត្រូវឱ្យរចនា និងសាងសង់ឡើងស្របតាមបទដ្ឋានសុវត្ថិភាពត្រឹមត្រូវទេ" ។ លោកបានបន្ថែមថា កម្ពុជា ក៏គ្មានបទដ្ឋានសុវត្ថិភាពបែបនោះដែរ ហើយថា ឧប្បត្តិហេតុស្រដៀងគ្នានេះអាចនឹងកើតឡើងជាថ្មីម្តងទៀត ។

លោកស្រី ជីល ថាក់ឃើ (Jill tucker) អ្នកគ្រប់គ្រងបច្ចេកនៅកម្មវិធីរោងចក្រល្អប្រសើរ បានថ្លែងកាលពីថ្ងៃព្រហស្បត្តិ៍ថា រោងចក្រវីងស្តាស៊ូ មិនត្រូវបានត្រួតពិនិត្យដោយកម្មវិធីរោងចក្រល្អប្រសើររបស់អង្គការពលកម្មអន្តរជាតិនៅកម្ពុជាទេ ។ អង្គការពលកម្មអន្តរជាតិបានចាប់ផ្តើមត្រួតពិនិត្យរោងចក្រស្បែកជើងមួយចំនួនកាលពីឆ្នាំមុន ហើយក្នុងចំណោមរោងចក្រស្បែកជើងទាំង៤៥ ដែលពេលនេះនាំស្បែកជើងចេញពីកម្ពុជា មានតែរោងចក្រចំនួន៩ប៉ុណ្ណោះ ដែលមានការត្រួតពិនិត្យដោយកម្មវិធីរោងចក្រល្អប្រសើរនៅកម្ពុជា ។ លោកស្រីបានបកស្រាយថា ការចូលរួមក្នុងកម្មវិធីរោងចក្រល្អប្រសើរ គឺជាការស្ម័គ្រចិត្តទាំងស្រុង ។

លោកស្រី មែវី ហ្គាលវិន (Maeve Galvin) អ្នកពិគ្រោះយោបល់ប្រចាំកម្មវិធីរោងចក្រល្អប្រសើរនៅកម្ពុជា បានថ្លែងកាលពីថ្ងៃសុក្រថា ចាំបាច់ត្រូវតែមានការស៊ើបអង្កេត ។

លោកស្រីថ្លែងថា "អ្វីដែលយើងត្រូវការ គឺការស៊ើបអង្កេត ដើម្បីបានព័ត៌មាន និងរកឱ្យឃើញអ្នកដែលទទួលខុសត្រូវព្រមទាំងមូលហេតុដែលបានកើតឡើង" ៕




# អាហារថែមុខ បំប៉នសុខភាពស្បែកមុខ



សុខភាពស្បែកពិតជាសំខាន់ណាស់ចំពោះសុភាពបុរស និងនារី ជាពិសេសសុខភាពស្បែកផ្ទៃមុខតែម្តង ។ មុខឡើងមុនខ្មៅមានស្នាមគ្រើមអ្នកប្រាកដជាមិនចង់ទៅណាមកណានោះឡើយ ព្រោះអ្នកមានអារម្មណ៍ខ្មាស់គេ។ ដូច្នេះថ្ងៃនេះ យើងខ្ញុំ សូមបង្ហាញវិធីងាយៗ ៥ យ៉ាង ដែលអ្នកអាចធ្វើបាននៅផ្ទះ ដើម្បីបំប៉នសុខភាពស្បែកផ្ទៃមុខអ្នកឱ្យតឹងរលោងស្អាត :

**១. ទឹកក្រូចឆ្មារ**

ទឹកក្រូចឆ្មារជាឱសថដ៏សាមញ្ញបំផុត ដែលអាចធ្វើឱ្យស្បែកអ្នកភ្លឺរលោងគ្មានខ្លាញ់ជាប់ស្បែកមុខ។ វាអាចបង្រួមរន្ធញើសធំៗលើផ្ទៃមុខអ្នក (ធ្វើឱ្យតឹងស្អាត) ។ វិធីងាយៗ ដោយគ្រាន់តែអ្នកយកទឹកក្រូចឆ្មារមកលុបលាងផ្ទៃមុខអ្នកប៉ុណ្ណោះ ហើយត្រូវលាងជម្រះវិញក្នុងរយៈពេល២ ឬ ៣នាទី។

**២. ស៊ុត**

សារធាតុសនៃស៊ុតជួយផ្តល់សំណើម និងធ្វើឱ្យផ្ទៃមុខតឹងណែន។ អ្នកគ្រាន់តែយកសារធាតុសនោះមកលាបត្រដុសថ្នមៗលើផ្ទៃមុខ និងទុករយៈពេល ២ ឬ៣នាទី ចាំលុបលាងមុខសម្អាត។

**៣. ទឹកឃ្មុំ**



អ្នកអាចប្រើប្រាស់ទឹកឃ្មុំរាល់ថ្ងៃមកសម្អាតផ្ទៃមុខអ្នក។ ទឹកឃ្មុំផ្តល់សំណើមស្បែកផ្ទៃមុខទន់រលោង និងជួយកម្ចាត់មេរោគផ្សេងៗលើផ្ទៃមុខឆ្លងតាមដៃ និងធូលី។ អ្នកគ្រាន់តែយកទឹកឃ្មុំមកលាបថ្នមលើផ្ទៃមុខ និងទុកចោលរយៈពេល៥នាទី រួចចាំលុបលាងសម្អាត។ កាន់តែប្រសើរបើសិនអ្នកលាយទឹកឃ្មុំនឹងទឹកក្រូចឆ្មារបន្តិច។

**៤. ស្ត្របឺរី**

ផ្លែឈើប្រភេទនេះ មានប្រសិទ្ធភាពក្នុងការសម្អាតជាតិខ្លាញ់ និងធូលីលើផ្ទៃមុខ ដូចជាម៉ាស់អ៊ីចឹង។ ស្ត្របឺរី មានវីតាមីន C ដែលការពារមេរោគផ្សេងៗ។ វិធីងាយៗ ដោយអ្នកគ្រាន់តែបុកស្ត្របឺរីល្អិតរួចដាក់លើម៉ាស់បិទមុខ និងយកមកគ្របលើផ្ទៃមុខទុករយៈពេល៥នាទីជាការស្រេច។

**៥. ចេក**

ចេកផ្តល់សំណើមយ៉ាងច្រើនដល់ស្បែក និងធ្វើឱ្យស្បែកស្រស់ថ្លាឡើងវិញ។ អ្នកគ្រាន់តែកិនចេកលាយជាមួយនឹងទឹកឃ្មុំបន្តិច ហើយយកមកលាបថ្នមៗលើផ្ទៃមុខ។ ទុកចោលរយៈពេល ១០ នាទី ទើបលាងសម្អាតវិញ។ ការអនុវត្តវិធីទាំងអម្បាលម៉ានខាងលើ គឺអាស្រ័យថាតើអ្នកមានពេលវេលាច្រើនប៉ុណ្ណា។ អ្នកអាចអនុវត្តប្រចាំថ្ងៃ ឬ ៤ ឬ ៥ ថ្ងៃក្នុងសប្តាហ៍ក៏បាន៕

តមកពីទំព័រទី ១

## កិច្ចសម្ភាសន៍ រវាងអ្នកស្រី ទេព វន្នី...

**ទេព វន្នី :** សម្រាប់ទស្សនៈនាងខ្ញុំផ្ទាល់ ក៏ដូចជាទស្សនៈបងប្អូននៅតំបន់បឹងកក់ទាំង អស់ពួកខ្ញុំមិនដែលអស់សង្ឃឹមក្នុងការតស៊ូមតិឡើយ ហើយថា លទ្ធផលពួកខ្ញុំបានទទួលខ្លះៗ ដែរហើយ ។

**អ៊ុម លឿម :** ជាមួយគ្នានេះ តើសហគមន៍របស់អ្នកស្រី ឬក្នុងនាមអ្នកស្រីផ្ទាល់ធ្លាប់បាន ស្នើដល់អង្គការអន្តរជាតិនានា ដើម្បីឱ្យជួយធ្វើអន្តរាគមន៍ក្នុងការដោះលែងសកម្មជនដីធ្លី គឺអ្នកស្រី យោម បុប្ផា ដែលត្រូវបានអាជ្ញាធរសមត្ថកិច្ច ចាប់ដាក់ពន្ធនាគារដែរ ឬទេ ?

**ទេព វន្នី :** ចាស់ ! ក្នុងនាមនាងខ្ញុំដែលជាប្រជាពលរដ្ឋម្នាក់ដែលរងគ្រោះក៏ដូចជាប្រជាពលរដ្ឋនៅតំបន់បឹងកក់ និងក៏ដូចក្រុមគ្រួសារអ្នកស្រី យោម បុប្ផា និងអង្គការមួយចំនួនដែលតែងតែគាំទ្រនៅតែតាមដានមើលអំពីការរំលោភសិទ្ធិមកលើពួកនាងខ្ញុំជានិច្ច ហើយក៏សូមអំពាវនាវដល់រដ្ឋាភិបាលមេត្តាបញ្ឈប់ប្រើអំពើហិង្សា ឬប្រើប្រាស់ប្រព័ន្ធតុលាការ ដើម្បីដាក់សម្ពាធមកលើពួកនាងខ្ញុំដែលជាប្រជាពលរដ្ឋរបស់ពួកគាត់ និងជាម្ចាស់អំណាចរបស់ពួកគាត់ដែរ ។ អញ្ចឹងគឺគាត់ត្រូវតែដោះលែងអ្នកស្រី យោម បុប្ផា ដើម្បីឱ្យគេឃើញថា ប្រទេសកម្ពុជា ជាប្រទេសកាន់លទ្ធិប្រជាធិបតេយ្យដ៏ពិតប្រាកដមួយ និងមាន ការគោរពនូវសិទ្ធិមនុស្ស ។ តទៅទំព័រទី ២២

**អ៊ុម លឿម :** តាមអ្វីដែលនាងខ្ញុំបានដឹង និងបានតាមដានអ្នកស្រី យោម បុប្ផា គឺជាអ្នក



ទោសដោយសារអ្នកស្រីហ៊ានចេញមុខប្រឆាំង និងក្រុមហ៊ុន ក៏ដូចជាហ៊ានតស៊ូមតិជាមួយ និងសមត្ថកិច្ច ប៉ុន្តែផ្ទុយទៅវិញតុលាការបានចោទប្រកាន់អ្នកស្រីថា បានប្រើអំពើហឹង្សាវាយតបលើអ្នករត់ម៉ូតូឌុបឱ្យមានរបួសស្នាមចំនួនពីរនាក់ វិញ ចំពោះករណីបែបនេះ តើអ្នកស្រីធ្វើអត្ថាធិប្បាយយ៉ាងណាដែរបាទ! ?

**ទេព វន្នី :** ចាស់ ! ចំពោះនាងខ្ញុំផ្ទាល់ក៏ដូចជាប្រជាពលរដ្ឋរងគ្រោះដោយសារបញ្ហាដីធ្លីនៅបឹងកក់ ក៏ដូចជាប្រជាពលរដ្ឋនៅសហគមន៍ ផ្សេងៗទៀតដែលរងគ្រោះក្នុងការបណ្តេញចេញដោយបង្ខំ គឺគ្មានអ្វីចម្លែកសម្រាប់ពួកនាងខ្ញុំឡើយ ។ ព្រោះនាងខ្ញុំគិតថា នេះជាយុទ្ធសាស្ត្ររបស់មន្ត្រីពុករលួយមួយចំនួនដែលបានសហការណ៍ជាមួយក្រុមហ៊ុន គាត់តែងតែប្រើប្រាស់វិធីសាស្ត្រ ប្លែកៗ ដើម្បីដាក់គំនាបក្នុងការឱ្យពួកខ្ញុំហ្នឹងមានការបាក់ស្បាតភ័យខ្លាច ដើម្បីកុំឱ្យពួកខ្ញុំតស៊ូមតិតទៅទៀត ។ ហើយករណីរបស់អ្នកស្រី យោម បុប្ផា ហ្នឹង ក៏មិនខុស កាលពីគេចាប់ចំនួន១៣នាក់ ដោយគេចោទថា បានប្លន់ដីនិតិបុគ្គលសាធារណៈ និងប្រើអំពើហិង្សាលើសមត្ថកិច្ច ។ ជាមួយគ្នានេះ នាងខ្ញុំឆ្ងល់ថា តើគាត់ជាស្ត្រីមានសមត្ថភាពដែរ ឬអត់ទៅវាយបុរសពីនាក់ឱ្យរបួសពេញខ្លួន ហើយបែរជាអ្នកស្រី យោម បុប្ផា អត់មានរបួសសោះ ។ ហើយម្យ៉ាងទៀត បើសិនជាចោទអ្នកស្រី យោម បុប្ផា រួមគំនិតជាមួយបុគ្គលដៃដល់ណា ដែលប្រើអំពើហិង្សាទៅលើបុរសពីរនាក់ហ្នឹង សួរថា តើតុលាការបានចាប់ជនដៃដល់ហ្នឹងមកសួរចម្លើយហើយ ឬនៅ ?

**អ៊ុម លឿម :** សំនួរចុងក្រោយ តើអ្នកស្រីមានសារអ្វីខ្លះ សម្រាប់ជាការផ្តាំផ្ញើដល់ប្រជាពលរដ្ឋខ្មែរគ្រប់ច្រកល្ហកទូទាំងពិភពលោកទាំងអស់បាទ ?

**ទេព វន្នី :** ចាស់ ! សម្រាប់នាងខ្ញុំជាស្ត្រីខ្មែរមួយរូប សូមអំពាវនាវដល់ពលរដ្ឋទាំងអស់ សុំឱ្យយើងចេះស្រលាញ់គ្នាចេះជួយគ្នា បើសិនគេគាបសង្កត់លើខ្មែរណាម្នាក់ គឺជាការគាបសង្កត់ទៅលើខ្មែរទាំងអស់គ្នាដែរ អញ្ចឹងសូមឱ្យយើងចេះជួយគ្នាចេះសាមគ្គីគ្នា ៕



# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហោង

ជោគជតាប្រចាំសប្តាហ៍

**ឆ្នាំជូត**

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំថោះ**

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំមមី**

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំរកា**

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំឆ្លូវ**

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំរោង**

រាល់ការស្អុតស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

**ឆ្នាំមមែ**

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំច**

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំខាល**

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្អុតស្អាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំម្សាញ់**

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំវក**

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំកុរ**

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

# កុមារទទួលទានអំបិលច្រើន ធ្វើឱ្យប៉ះពាល់ដល់សុខភាព

អ្នកស្រាវជ្រាវបានថ្លែងថា ការទទួលទានអំបិល ឬសូដ្យូមច្រើនអាចធ្វើឱ្យកុមារឡើងទម្ងន់ និងមានសម្ពាធឈាមខ្ពស់ ។ ក្នុងមួយថ្ងៃមនុស្សយើងគួរទទួលទានអំបិល ឬសូដ្យូមប្រមាណជា១៥០០មិល្លីក្រាម និងចៀសវាងកុំឱ្យលើសពី២៣០០មិល្លីក្រាម ។

ការសិក្សានេះពឹងផ្អែកលើទិន្នន័យប្រមូលពីក្មេង៦២០០នាក់អាយុចន្លោះ៨ ទៅ១៨ឆ្នាំ ។ លិទ្ធផលបានបង្ហាញថា កុមារ និងយុវវ័យភាគច្រើនទទួលទានអាហារដែលមានសូដ្យូមជិត៣៤០០មិល្លីក្រាមក្នុងមួយថ្ងៃ ហើយបុរស គឺជាអ្នកញុំាអាហារប្រៃច្រើនជាងស្ត្រី ។

ក្មេងដែលញុំាអាហារមានអំបិល ឬសូដ្យូមច្រើនឆាប់ប្រឈមនឹងជំងឺលើសឈាម ។ អត្រាប្រឈមនេះគឺខ្ពស់ជាងក្មេងទូទៅដល់ទៅព្យ៥ដង ។ដើម្បីបង្ការបញ្ហានេះកុមារគួរទទួលទានបន្លែ ផ្លែឈើ គ្រាប់ធញ្ញជាតិទាំងមូល និងម្ហូបអាហារស្រស់ៗឱ្យបានច្រើនផងដែរ ដើម្បីឱ្យរបបអាហារមានតុល្យភាព ៕

តមកពីទំព័រទី ១៧ កម្ពុជាភ្លក់រសជាតិ...

ពីជាង១០ឆ្នាំមកហើយ ។ លក្ខខណ្ឌទី៣ គឺការរួមកម្លាំងរវាងគណបក្សទាំងពីរសន្យាជាឱឡារិកថា បំរើប្រជាជាតិដោយស្មោះស្ម័គ្រដោយគុណភាពខ្ពស់ដោយគ្មានប្រាថ្នាគុណបំណាច់ ឬក្រាញននាលក្នុងអំណាចពិសេសផ្ទាល់ខ្លួនណាមួយឡើយ ។ ដោយសារតែការខិតខំប្រឹងប្រែងច្រើនឆ្នាំយ៉ាងព្យាយាមក្រោមព្យុះភ្លៀងការចងសម្ព័ន្ធដ៏ថ្មីថ្មោង ក៏មែនពិតតែទទួលបាននូវជំនឿ និងការគាំទ្រយ៉ាងកក់ក្ដៅពីសំណាក់ពលរដ្ឋកាន់តែច្រើនបានឆាប់រហ័សលឿនហួសពីការស្មាន ។ នៅតែមានអ្នកមិនទាន់ជឿជាក់លើសម្ព័ន្ធភាពថ្មីនេះនៅឡើយតែសមាជិកគណបក្សសង្គ្រោះជាតិកំពុងទទួលអំណោយផលពីរ គឺ១ចរន្តពិភពលោកកំពុងឱ្យតម្លៃលើលទ្ធិប្រជាធិបតេយ្យយ៉ាងចេញមុខ ទី២ប្រជាជាតិខ្មែរត្រូវការកម្លាំងដើម្បីរំដោះខ្លួនទៅព្យាបាលជម្ងឺខកចិត្តកើតតាំងពីអតីតកាលក្នុងរបបកុម្មុយនីស្តមកដល់បច្ចុប្បន្ននេះទើបជួបចរន្តថ្មីនេះដែលគួរឱ្យជឿបាន ។

តើគណបក្សប្រជាជននិងឈរមើលគណបក្សប្រឆាំងប្រែប្រួលយ៉ាងអសកម្ម ឬយ៉ាងណា ? តើឥរិយាបថប្រជាពលរដ្ឋ គណបក្សប្រជាជន ឬគណបក្សសង្គ្រោះជាតិ និងប្ដូរយកយុទ្ធសាស្ត្រថ្មីណាមួយមកប្រើ ?

**សូមរង់ចាំអាន បទវិភាគលេខក្រោយ ។**




# កម្មវិធីជំនួយផ្នែកថែទាំសុខភាពតាមផ្ទះរដ្ឋ

## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន
បុគ្គលិកមានសណ្ដានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ



*Compassionate Care & Reliable*
*Professional & Cultural Sensitive*
*Management & Staffs speak Khmer*

កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហារាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្ដល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្ដង ។

Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

To be eligibled for GAFC you must:

- រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)
- អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)
- មាស់ហែលស្ដង់ដា (eligible for Masshealth Standard)
- ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀក-ពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)
- មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)
- ត្រូវបានវាយតំលៃផ្នែកសុខភាព នឹងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )

### ផលប្រយោជន៍ទទួលបាន :

Benefits you will get:

- ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)
- ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)
- ផែនការថែរទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីយើ (an individual care plan developed by a registered nurse and case manager)
- វាយតំលៃលើសេចក្ដីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)
- សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

ដើម្បីចុះឈ្មោះសូមទាក់ទងមក
To register, please contact:



ឱក តុលាយុទ្ធ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404, Lowell, MA 01852



ពិន ឆាវ៉ាន់ លីន រីវៀរ បូស្តុន
Chhavan Pin: Lynn, Revere, Boston
Tel:(617)783-7177, Fax: (617) 783-7188
Office: 214 Lincoln St., Suite 200, Allston, MA 02134



"នាងប្រាប់ខ្ញុំគ្រប់យ៉ាង

# ខ្ញុំសប្បាយចិត្តខ្លាំងណាស់។

នាងពេញចិត្តនៅផ្ទះជាមួយយើង។"





CAREGIVER™
HOMES

Caregiver Homes™ ជួយចាស់ជរា និងជនពិការឱ្យរីករាយជាមួយ នឹងគុណភាពខ្ពស់នៃជីវិតនៅផ្ទះ

- បង់ប្រាក់ & បង្រៀបណ្ដុះបណ្ដាល អ្នកថែទាំពេញពេលដែលរស់នៅជាមួយ
- ផ្ដល់ជំនួយ ប្រកបដោយវិជ្ជាជីវៈ ពីគិលានុបដ្ឋាយិកា និង អ្នកថែទាំ ដែលចេះយកចិត្តទុកដាក់
- ជួយអ្នកស្វែងរក & ទទួលបានគ្រប់សេវាដែលចាំបាច់

សម្រាប់ព័ត៌មានបន្ថែម សូមទំនាក់ទំនង **866.797.2333** ឬចូលមកគេហ៍ទំព័ររបស់យើង។

**WWW.CAREGIVERHOMES.COM**

តមកពីទំព័រទី ១

## សកលវិទ្យាល័យសំរាប់សហគមន៍...

តំណាងនិស្សិតពីររូបរួមមានអេដសិនណូវីនយ៉ូ (Edson Novinyo) មានGPA 3.5 សញ្ជាតិដើមជាជនជាតិហ្គាណា និងរ៉េបេការ៉ូស(Rebecca



Rose) មានGPA 3.72បានឡើងថ្លែងសុន្ទរកថាផ្ដល់ចំណាប់អារម្មណ៍ និងលើកយកនូវលទ្ធផលនៃការសិក្សាក៏ដូចជាបទពិសោធន៍ដែលគេបានឆ្លងកាត់ខណៈរៀននៅមហាវិទ្យាល័យនេះដោយសង្ខេបអំពីគុណតម្លៃនៃសហគមន៍ និងសេចក្ដីព្យាយាមក្នុងការរៀនសូត្រ ។ និស្សិតដែលបញ្ចប់ការសិក្សានាឆ្នាំ២០១៣នេះស្ថិតនៅក្នុងរ៉ូប និងមួកពណ៌ខៀវ ហើយកម្មវិធីនាវេលានោះមិនត្រឹមតែផ្ដល់ជូននូវការអបអរសាទរដល់និស្សិតដែលបញ្ចប់ការសិក្សាប៉ុណ្ណោះទេ តែក៏ជាពិធីផ្ដល់ជូននូវប័ណ្ណសរសើរកិត្តិយសដល់មន្ត្រីបំពេញការងារដែលមានស្នាដៃល្អបង្ហាញនូវការកោតសរសើរលើកទឹកចិត្តដល់អ្នកទាំងអស់នោះផងដែរ ។

ពិធីចែកសញ្ញាប័ត្របានបញ្ចប់ជាស្ថាពរនូវវេលាម៉ោង១២ និង៣០នាទីរសៀលហើយអ្នកចូលរួមទាំងអស់ធ្វើដំណើរចេញពីសាលអនុស្សាវរីយ៍ក្រុងឡូវែល (Lowell Memorial Auditorium) ឆ្ពោះទៅកាន់អគារស៊ីធីហាល ( City Hall Building) ដើម្បីសន្ទនាសំណេះសំណាលថតរូបអនុស្សាវរីយ៍ និងពិសាអាហារបញ្ចប់កម្មវិធី ៕

**អត្ថបទដោយ សុខា**



# ម្ចាស់ស្នាដៃសំពត់មានទម្ងន់ លាង ស៊ីកន ច្នៃឆ័ត្រយោង សង្គ្រាមអាមេរិកឱ្យក្លាយជាឆ័ត្រសន្តិភាព









**ទីក្រុងញូវយ៉ក:** នៅសាកលវិទ្យាល័យកូឡុំបៀ ក៏ដូចជាសារមន្ទីរប្រេនស៍នាទីក្រុងញូវយ៉ក ចុងខែមេសា និងដើមខែឧសភា ឆ្នាំ២០១៣ មានការដាក់តាំងបង្ហាញ និងដង្ហែនូវវត្ថុសិល្បៈច្នៃប្រឌិតមួយប្រភេទដែលកើតចេញពីការតុបតែងរូបលលាដ៏ក្បាលធ្វើពីត្រឡោកដូងបំពាក់ដោយមួកដាក់បន្ទុបលើដងខ្លួនដែលគ្រោងដោយឯកសណ្ឋានទាហ៊ានខ្មែរ ហើយផ្នែកខាងក្រោមគ្របដណ្ដប់ដោយឆ័ត្រយោងសង្គ្រាមរបស់អាមេរិកដែលត្រូវបានរកឃើញនៅក្បែរវត្តមេលប់ ស្រុកពារាំង ខេត្តព្រៃវែង។ លក្ខណៈពិសេសនៃវត្ថុសិល្បៈមួយនេះ គឺកញ្ចុំផ្កាជាច្រើនលាយឡំដោយក្បាច់ និងពណ៌ចម្រុះដែលត្រូវបានដេរពីលើឆ័ត្រយោង និងដែលត្រូវបានកាត់ចេញពីសំពត់របស់ស្ត្រីខ្មែររស់នៅក្នុងខេត្តព្រៃវែងឧបត្ថម្ភដល់លោកលាង ស៊ីកនក្នុងការច្នៃប្រឌិតវត្ថុសិល្បៈមួយនេះ ។ ពិពណ៌មួយនេះ ជាផ្នែកមួយនៃរដូវកាលកម្ពុជា ឬ Season of Cambodia ដែលលោក លាង ស៊ីកន មានបំណងពាំនាំនូវការច្នៃប្រឌិតមួយនេះសំដៅបង្ហាញការពិសោធនូវចម្ងល់ផ្ទាល់ខ្លួនរបស់គាត់ទាក់ទិននឹងសង្គ្រាមដែលកើតមាននៅប្រទេសខ្មែរកាលពីឆ្នាំ៧០ ពោលគឺពេលដែលម្ដាយរបស់លោកកំពុងតែមានគភ៌លោក ។ ស្ដាប់ម្ដាយរបស់លោករៀបរាប់ពីព្រឹត្តិការណ៍ដែលគាត់បានឆ្លងកាត់ពេលសង្គ្រាមរួមមានជីវភាពលំបាកមានសំលៀកបំពាក់តែមួយបម្លាស់នោះគឺសារ៉ុងដែលប៉ះដោយបំណាស់ស្ទើរគ្រប់កន្លែងគួបផ្សំនឹងភាពរីកររដោយការទម្លាក់គ្រាប់បែកខណៈដែលម្ដាយលោកត្រូវរត់គេចចំពេលដែលត្រូវពពោះលោកទៀតនោះ លោក លាង ស៊ីកន ការចាប់ផ្ដើមបង្កើតនូវស្នាដៃមួយឱ្យឈ្មោះថាសំពត់មានទម្ងន់ ។ បន្ទាប់មកលោក លាង ស៊ីកន ក៏បង្កើតវត្ថុសិល្បៈ គឺឆ័ត្រសន្តិភាពនេះ ហើយត្រូវបានយកទៅតាំងជាច្រើនប្រទេស ។ ផ្អែកតាមលោក លាង ស៊ីកន ការបង្កើតវត្ថុសិល្បៈធ្វើពីឆ័ត្រយោងនេះ គឺដើម្បីអហោសកម្មភាពជូរចត់លំបាកវេទនា កើតឡើងដោយសារសង្គ្រាម និងបញ្ចៀសសោកនាដកម្មនេះ កុំឱ្យមានសារជាថ្មីម្ដងទៀត ហើយរក្សាសន្តិភាពរវាងកម្ពុជា និងអាមេរិក ក៏ដូចជាប្រទេសនានាលើពិភពលោករហូតតទៅ ។

*អត្ថបទដោយ: សុខា រូបថតដោយ: ភីត ភីន*